# ខ្មែរប៉ុស្តិ៍ ស.រ.អា

# KhmerPost USA

Printing The Cambodian World News

VOL. 06 ISSUE 87 July 22th - Aug 11th, 2011

សុបិន : (267) 253-3947, សែម : (781) 244-0522

MASSACHUSETTS
217 APPLETON ST.
LOWELL, MA 01852
PENNSYLVANIA
438 LINDLEY AVE.
PHILADELPHIA, PA 19120
RHODE ISLAND
NEW JERSEY


| មាតិការឿង | ទំព័រ |
|---|---|
| ១- ចូលវស្សានៅវត្តព្រះពុទ្ធប្រទានពរ | ០១ |
| ២- ប្រទេសស៊ីរី ម្ចាស់ស្រមោលសង្គ្រាម | ០៣ |
| ៣- គំនិតអ្នកស្រឡាញ់ជាតិមាតុភូមិ | ០៥ |
| ៤- ប្រវត្តិសាស្ត្រកម្ពុជា | ១៨ |
| ៥- សារទូរលេខសម្ងាត់បង្ហាញពីការយកចិត្ត | ០៧ |
| ៦- The Cambodia Daily | ០៨ & ១៣ |

## សហាគមន៍ព្រះសង្ឃខ្មែរនៅ សហរដ្ឋអាមេរិកដល់ណាហើយ?

**ឡូវែល :**

ខ្មែរប៉ុស្តិ៍បានធ្វើសេចក្តីរាយការណ៍វែងអន្លាយមួយស្តីពីសហាគមន៍ព្រះសង្ឃខ្មែរនៅ ស.រ.អា កាលពីខែឧសភា ឆ្នាំ ២០១១តែទទួលបាននូវការអបអរពីព័ត៌មានថ្មីច្រើនជាងការធុញថប់ និងអាន ។

**សហាគមន៍ព្រះសង្ឃខ្មែរជាអ្វី ?**

គឺជាក្រុមប្រជុំរបស់ព្រះសង្ឃមកពីវត្តដែលមានចៅអធិការមកពីកម្ពុជា ហើយមានបំណង និងសាមគ្គីគ្នារៀបចំនិងការប្រតិបត្តិសាសនាព្រះពុទ្ធផ្នែកថេរវាទឱ្យមានអភិវឌ្ឍន៍ល្អប្រសើរ ។ នៅក្នុងប្រទេសឯណោះរចនាសម្ព័ន្ធគ្រប់គ្រងព្រះសង្ឃនិងទីវត្តអារាមមានលក្ខណៈគ្រប់គ្រាន់មានលំដាប់ថ្នាក់ក្បួនច្បាប់ និងការអនុវត្តនីវិន័យស្របជាមួយនឹងច្បាប់នៅក្នុងប្រទេសកម្ពុជា ។ ចំណែកឯនៅឯបរទេសវិញ ដូចជានៅ ស.រ.អា នៅបារាំងនៅកាណាដា ឬនៅអូស្ត្រាលីវត្តនីមួយៗមានលក្ខណៈច្បាប់គ្រប់គ្រងខុសៗគ្នា ហើយពុំមាននរណាគ្រប់គ្រងវិន័យរបស់


ព្រះអង្គ សៅ ឃន

តទៅទំព័រទី ១៨


ព្រះអង្គ សៅ ឃន បង្ហាញដីថ្មី

## សារទូរលេខសម្ងាត់បង្ហាញពីគោលជំហររឹងមាំរបស់ លោក ហ៊ុន ម៉ាណែត លើបញ្ហាព្រំដែនជាមួយថៃ

### CABLES SHOW HUN MANET'S TOUGH BORDER STANCE

**ដោយ : ZSOMBOR PETER**
**THE CAMBODIA DAILY**

ផ្ទុយពីចរិតលក្ខណៈរបស់លោកដែលមិនចង់ទទួលបានការចាប់អារម្មណ៍ពីសាធារណជននោះ សារទូរលេខសម្ងាត់មួយចំនួនរបស់ស្ថានទូតសហរដ្ឋអាមេរិក ដែលបានបែកធ្លាយនៅសប្តាហ៍នេះ បានពណ៌នាលោក ហ៊ុន ម៉ាណែត ជាមន្ត្រីជាន់ខ្ពស់កងយោធពលខេមរភូមិន្ទ ដែលត្រូវជាកូនប្រុសច្បងរបស់លោកនាយកមន្ត្រី ហ៊ុន សែន ថាជាមនុស្សប្រកាន់តឹងចំពោះទំនាក់ទំនងកម្ពុជា-ថៃ ដែលពេលខ្លះផ្ទុយពីការរំពឹងទុករបស់ស្ថានទូតនេះ ទៅទៀត ។

នៅក្នុងសារទូរលេខសម្ងាត់មួយកាលពីខែសីហា ឆ្នាំ២០០៨ ដែលវិបសាយ WikiLeaks បានបញ្ចេញអំពីការទទួលទានអាហារថ្ងៃត្រង់លាគ្នារវាងលោក ចូសេហ្វ មូសូម៉េលី ជាឯកអគ្គរដ្ឋទូតសហរដ្ឋអាមេរិក ដែលជិតចប់អាណត្តិជាមួយលោក ហ៊ុន ម៉ាណែត ដែលពេលនោះមានឋានន្តរស័ក្តិជាឧត្តមសេនីយ៍ត្រីនោះ អ្នកទាំងពីរនេះបានផ្លាស់ប្តូរយោបល់គ្នាទៅវិញទៅមកស្តីពីទំនាក់ទំនងព្រំដែនប្រែប្រួលរវាងប្រទេសកម្ពុជា និងប្រទេសថៃក្រោយពីមានការលុកលុយពីសំណាក់ទាហ៊ានថៃចូលមកក្នុងទឹកដីជុំវិញប្រាសាទព្រះវិហារ ។

រយៈពេលមួយខែមុននោះ នៅពេលដែលខ្លួនទទួលបានការគាំទ្រពីសំណាក់រដ្ឋាភិបាលក្រុងបាងកក


លោក ហ៊ុន ម៉ាណែត

ដែលមានទំនាក់ទំនងល្អ ប៉ុន្តែដែលមានភាពទន់ខ្សោយក្រោមសម្ពាធរបស់យោធាខ្លួនឯងនោះ ប្រទេសកម្ពុជាបានបញ្ចុះបញ្ចូលគណៈកម្មាធិការបេតិកភណ្ឌពិភព-លោកឱ្យដាក់បន្ថែមប្រាសាទព្រះវិហារចូលទៅក្នុងបញ្ជីនៃតំបន់ប្រវត្តិសាស្ត្ររបស់ខ្លួនដោយជោគជ័យ ។

យោងតាមសារទូរលេខសម្ងាត់នេះបានឱ្យដឹងថា លោក ហ៊ុន ម៉ាណែត បានសម្តែងនូវការព្រួយបារម្ភថា ការឆ្លើយតបដោយសន្តិវិធីរបស់កម្ពុជាចំពោះការចូលលុកលុយរបស់ថៃនឹងបញ្ជូនសារខុសទៅក្រុងបាងកក ។

(តទៅទំព័រទី ១៣)

## ពិធីបុណ្យអុំទូកនៅឡូវែលឆ្នាំ២០១១

ឡូវែលរដ្ឋម៉ាសាឈូសែត មានទម្លាប់ចំណាស់១៥ឆ្នាំហើយក្នុងការរៀបចំពិធីបុណ្យអុំទូក ដែលជាប្រវត្តិប្រពៃណី នៅអាស៊ីអាគ្នេយ៍ ។ រៀងរាល់ឆ្នាំជនជាតិអាស៊ីនៅ ស.រ.អា រាប់ពាន់ម៉ឺននាក់នាំគ្នាធ្វើដំណើរជាច្រើនរយម៉ាយ ដើម្បីទៅចូលរួមក្នុងពិធីរបស់ជនជាតិអាស៊ីដ៏ធំជាងគេបង្អស់មួយនេះ ដែលទីក្រុងឡូវែល មានកិត្តិយសជាអ្នកទទួលភ្ញៀវ ។ បុណ្យអុំទូកបានកើតឡើងនៅឡូវែលពីព្រោះក្រុងនេះមានជនជាតិដើមកំណើតខ្មែរច្រើនជាងគេរស់នៅលើទឹកដីនោះចំនួនប្រមាណ៣០ឆ្នាំហើយ ហើយ ប្រវត្តិបុណ្យអុំទូកនេះបានត្រូវយកមកពីកម្ពុជា ដែលគេតែងប្រារព្ធនៅដើមដៃទន្លេសាបដ៏ល្បីល្បាញនាខែវិច្ឆិកាដោយសារទន្លេនោះមានលក្ខណៈពិសេសគ្មានពីរក្នុងលោក គឺទឹកហូរទៅទិសទន្លេសាបក្នុងរយៈពេល៦ខែ ហើយទឹកដដែលនោះហូរត្រឡប់ថយក្រោយទៅទន្លេមេគង្គវិញ នៅពេល៦ខែបន្ទាប់មកទៀត ។ បងប្អូនខ្មែរ ដែលរស់នៅទីនោះបាននាំវប្បធម៌អុំទូកនេះ មកឡូវែលនៅឆ្នាំ១៩៩៩ ហើយរៀងរាល់ឆ្នាំបន្តបន្ទាប់ បាននាំប្រជាប្រិយភាពកើតតែខ្ពស់ជាលំដាប់ ។ ឆ្នាំ២០០២ បុណ្យអុំទូកខ្មែរនេះបានក្លាយទៅជាពិធីនៃវប្បធម៌ អាស៊ីអាគ្នេយ៍មានខ្មែរ, ឡាវ, យៀក ណាម, ថៃចូលរួមហើយមានឈ្មោះថា "បុណ្យអុំទូករបស់អាស៊ីអាគ្នេយ៍នៅឡូវែល" ឆ្នាំនេះ នឹងប្រព្រឹត្តទៅនៅថ្ងៃ១៩នឹង២០សីហា ២០១១។ កម្មវិធីបុណ្យផ្តើមឡើងដោយពិធីបណ្តែតកន្ទោង ដែលជាប្រពៃណីនៃប្រទេសខ្មែរ-ឡាវ និងថៃនឹងត្រូវប្រព្រឹត្តទៅនៅរាត្រីថ្ងៃទី១៩ សីហា ហើយបន្តទៅថ្ងៃទី២០ សីហា ដោយពិធីប្រណាំងទូកនៅលើទន្លេមេរីម៉ាក់ ។ នាថ្ងៃទីពីរនៃពិធីបុណ្យនោះ ពាណិជ្ជករ សិល្បករ និងអ្នកឯកទេសនាំគ្នាបញ្ចេញស្នាដៃ បង្ហាញផលិតផលរបស់ខ្លួនជាហូរហែរតាមដងទន្លេក្បែរពិធីអុំទូកនោះ ។



ឆ្នាំនេះខ្មែរប៉ុស្តិ៍ ស.រ.អា ក៏មានវត្តមានជាលើកដំបូងនៅទីនោះដែរក្នុងបំណងចូលរួមឱ្យបានជិតស្និតជាមួយមហាគ្រួសារអាស៊ីដែលរស់នៅកកកុញក្នុងតំបន់និងជុំវិញបរិវេណនៃទីក្រុងឡូវែលនោះ ។ **ដោយៈ ខ្មែរប៉ុស្តិ៍**

# បុណ្យផ្កាប្រាក់សាមគ្គី



ខ្ញុំព្រះករុណា អាត្មាភាព ជាគណៈកម្មាធិការអចិន្ត្រៃយ៍ សហគមន៍ព្រះសង្ឃខ្មែរសហរដ្ឋអាមេរិក និងពុទ្ធបរិស័ទ ជាពុទ្ធសាសនូបត្ថម្ភគ្រប់ទិសទី ជាពិសេសនៅរដ្ឋម៉ាស្សាឈូសេត្ស៍,រដ្ឋម៉ែន, នូហែមសៀ, និងរ៉ូដអៃឡិន... បានឯកភាពគ្នាផ្តើមធ្វើបុណ្យផ្កាប្រាក់សាមគ្គី ដើម្បីប្រមូលបច្ច័យជួយឧបត្ថម្ភដល់ការជាវដីកសាងវត្តសម្រាប់សហគមន៍ព្រះសង្ឃខ្មែរ ធ្វើជាមជ្ឈមណ្ឌលបណ្តុះចំណេះដឹងផ្លូវពុទ្ធសាសនា និងស្មារតីស្នេហាជាតិដល់ព្រះសង្ឃ និងកូនចៅខ្មែរនៅសហរដ្ឋអារមេរិកផង និងធ្វើជាមជ្ឈមណ្ឌលថែរក្សាវប្បធម៌ជាតិសម្រាប់កូនចៅខ្មែរ ក៏ដូចជាបង្ហាញដល់ជនបរទេសឱ្យស្គាល់ពីវប្បធម៌ដ៏មានតម្លៃរបស់ខ្មែរយើងផងដែរ ។

អាស្រ័យដូចបានទូលថ្វាយ និងជម្រាបខាងលើ ខ្ញុំព្រះករុណាអាត្មាភាព សូមអារាធនិមន្តព្រះតេជគុណ និងអញ្ជើញញាតិញោមបងប្អូនប្រជាពុទ្ធបរិស័ទជិតឆ្ងាយ និងសប្បុរសជនទាំងឡាយដែលមានសន្តានចិត្តស្រឡាញ់ជាតិសាសនាចង់ឱ្យសង្គមខ្មែរយើងនៅសហរដ្ឋអាមេរិកមានកិត្យានុភាព វឌ្ឍនភាព និងសាមគ្គីភាព តាមមាគ៌ាព្រះពុទ្ធសាសនា សូមព្រះមេត្តា និងមេត្តាចូលរួមអនុមោទនាបុណ្យដោយនាំមកជាមួយនូវដើមផ្កាប្រាក់ និងចាប់មគ្គផលតាមសទ្ធាជ្រះថ្លាឱ្យបានច្រើនកុះករកុំបីខាន ។

## ទីតាំងប្រារព្ធពិធីបុណ្យ: ភោជនីយដ្ឋាន សំពៅមាស

450 Chelmsford St., Lowell, MA

Tel: (978) 421-5256

## កាលបរិច្ឆេទ និងកម្មវិធីបុណ្យ

**ថ្ងៃអាទិត្យ ៨កើត ខែ ស្រាពណ៍ ឆ្នាំ ថោះ ត្រីស័ក ព.ស ២៥៥៥**

**ត្រូវនឹងថ្ងៃទី៧ ខែ សីហា គ.ស ២០១១**

(August7,2011)

- ម៉ោង ៩:០០ព្រឹក (9:00AM) ជួបជុំពុទ្ធបរិស័ទ និងចាប់ផ្តើមសាសនពិធី
- ម៉ោង ១០:០០ព្រឹក (10:00AM) ពិធីវេរប្រគេនដី
- ម៉ោង ១១:០០ព្រឹក (11:00AM) វេរភត្តាហារ និងអង្គផ្កាបរិក្ខារជូនដល់ព្រះសង្ឃ បង្សុកូលឆ្លងបុណ្យ ព្រមទាំងឧទ្ទិសកុសលជាកិច្ចបញ្ចប់ ។

**ព័ត៌មានបន្ថែមសូមទាក់ទង : ព្រះតេជគុណ សុវណ្ណ ហុក (លោកតា សៀមរាប) ទូរស័ព្ទ 401996 0664**

**ព្រះតេជគុណ ចេង លាង ទូរស័ព្ទ (978) 251 2709**

**អ្នកស្រី ម៉ែន ម៉ាយ៉ា ទូរស័ព្ទ 978 501 0106/978 251 2709**

## អ្នកផ្តើមបុណ្យ

1- ព្រះសង្ឃាធិបតី **សៅ យន** ធម្មថេរោ
2- ព្រះតេជគុណ **គង់ សុផាន** CA.
3- ព្រះតេជគុណ **ព្រហ្ម ខៀន** CA.
4- ព្រះតេជគុណ **ថុង សុផុន** MA.
5- ព្រះតេជគុណ **សែម សុខឿន** CA.
6- ព្រះតេជគុណមហា **យិន ឡឿន** CA.
7- ព្រះតេជគុណ **គីម ភាព** VA.
8- ព្រះតេជគុណ **សុវណ្ណ ហុក** (លោកតា សៀមរាប)RI
9- ព្រះតេជគុណ **អឿន ហៀង** CT.
10- ព្រះតេជគុណបណ្ឌិត **ញៀម គីមតេង** Cambodia.
11- ព្រះតេជគុណមហា **សម យស** France
12- ព្រះតេជគុណ **សែន សុវណ្ណ** CA.
13- ព្រះតេជគុណ **ចេង លាង** MA.
14- ព្រះតេជគុណ **ជួង ម៉ិនស៊ុម** MA.
15- ព្រះតេជគុណ **ជូសាយមុនី** MA
16- ព្រះតេជគុណ **ហ៊ឹម ឆាក់** ME
17- ព្រះតេជគុណ **កើត សំបូរ** SC
18- សាមណេរ **ធិន ឈឿប** MA
19- សាមណេរ **ម៉ុង ចឿន** ME

# ចូលវស្សានៅវត្តព្រះពុទ្ធប្រទានពរ

ដោយ : ពិន សំខុន

**ហ្វីឡាដែលហ្វៀ :** ចូលវស្សាឆ្នាំនេះ ពុទ្ធបរិស័ទវត្តព្រះពុទ្ធប្រទានពរនៅ 1732 ផ្លូវ MiFFLiN មានទឹកមុខរីករាយចម្លែក ដោយសារការព្យាយាមការទាមទារយកវត្ត ពីអតីតចៅអធិការ ស៊ុម សាក់ បានមកវិញប្រកបដោយជោគជ័យ។ លោក ស៊ុម សាក់ បានទទួលយកសេចក្ដីសម្រេចរបស់ចៅក្រម ហើយបានចាកចេញពីបន្ទប់ដែល លោកស្នាក់នៅអាស្រ័យក្នុងវត្តប្រកប






ដោយភាពចម្រូងចម្រាសច្រើនឆ្នាំមកហើយ កាលពីថ្ងៃទី២កក្កដា។

ធ្លាប់រស់នៅទាំងភ័យខ្លាច លោក ស៊ុម សាក់ ដេញចេញពីវត្ត ព្រះសង្ឃជាច្រើនអង្គ បានចាកចេញទៅគង់នៅទីវត្តផ្សេងនាពេលមុន ឥឡូវនេះគេនាំគ្នា និយាយពីគម្រោងកសាងវត្តលើកដំកើងកេរ្តិ៍ឈ្មោះឡើងវិញ ក្នុងបរិយាកាសត្រជាក់ចិត្ត ថ្វីត្បិតតែធាតុអាកាសពេលចូលវស្សាឆ្នាំនេះ សីតុណ្ហភាពឡើងដល់លើ១០០អង្សាហើយក៏ដោយ។ ជាមួយព្រះសង្ឃនៅសល់តែ១អង្គ ការរៀបចំពិធីដោយអាចារ្យ និងពុទ្ធបរិស័ទចំណុះជើងវត្ត ពុំមានខ្វះខាតភាពសមរម្យបន្តិចណាឡើយ ដើម្បីជាកិច្ចអរព្រះគុណដល់ព្រះសង្ឃ ដែលសុខព្រះទ័យគង់ចាំវស្សាតែ១អង្គឯងយ៉ាងត្រៀមក្រោះ និងដើម្បីផ្ដល់កិត្តិយសដល់ព្រះអង្គដែលបានទទួលភារកិច្ចគ្រប់គ្រងវត្តថ្មីថ្មោងជាចៅអធិការថែមទៀតផង។

វត្តមានលក្ខណៈគ្រប់គ្រាន់ វត្តអារាមបានត្រូវវេប្រគេនព្រះគ្រូចៅអធិការ ហ៊ុន សិទ្ធិ តាមគន្លងពុទ្ធសាសនា តែលើកនេះ ទាំងអស់គ្នាមិនបានយល់ច្រឡំដូចមុនថា វត្តព្រះពុទ្ធប្រទានពរនេះ ជាសម្បត្តិផ្ទាល់របស់ព្រះគ្រូចៅអធិការនោះទេ មេរៀនថ្មីៗធ្វើឱ្យទាំងអស់គ្នាចងចាំថាវត្តនេះជាសម្បត្តិរបស់សហគមន៍យ៉ាងពិតប្រាកដ។ បន្ថែមលើ បុណ្យចូលវស្សានេះ លោក ត្រៃ ហ៊ល ប្រធានគណកម្មាធិការវត្តពោរពេញដោយមោទនភាព បានប្រកាសដឹកមុខអ្នកផ្ដើមបុណ្យប្រមាណ ៣០នាក់ ដើម្បីធ្វើបុណ្យផ្កាមួយ ដើម្បីឧបត្ថម្ភវត្តដែលនឹងប្រព្រឹត្តទៅនៅថ្ងៃសុក្រនិងសៅរ៍ទី ២៩-៣០ កក្កដា ២០១១។ លើកនេះសង្ឃឹមថា បរិយាកាសថ្មីនឹងនាំពុទ្ធបរិស័ទថ្មីមកចាប់កុសលច្រើនជាងមុន៕

# ប្រទេសស៊ីរី : "ម្ចាស់ស្រមោលសង្គ្រាមត្រជាក់ថ្មី"

**ដោយ: វិមល គិម**



បាចាអែល អាស់សាដ៍ (Bachar El Assad) មិនមែនជាបុគ្គលជននយោបាយម្នាក់ដែលអាចបង្កើត ឬជម្រុញភាពផ្លាស់ប្តូរក្នុងប្រទេសស៊ីរីរបស់គាត់ទេ ។ ផ្ទុយទៅវិញទេ ! គាត់មានកំណើតនឹងរស់ធំខ្លួន មានចំណេះបាន ក៏អាស្រ័យឪពុកគាត់ដែលជាជនផ្តាច់ការម្នាក់ ។ ដូច្នេះ (Bachar El Assad) នៅជំពាក់គុណគ្រួសារច្រើនមហិមា ។ ឆ្ងាយពីនេះទៅទៀត គាត់ពុំអាចឈានទៅបង្កើតការពិនិត្យសិក្សានូវអ្វីណាមួយដែលអាចមានទ្រង់ទ្រាយជាការប្តូររូបភាពនយោបាយប្រទេសស៊ីរី ក៏ប៉ុន្តែប្រជារាស្ត្រស៊ីរីលែងជឿហើយ.... "លោក អាសសាដ៍កំពុងសម្លាប់យើងទៅវិញទេ" បើយើងស្តាប់សំដីពពួកប្រជាជនភៀសខ្លួនទៅតាមជាយព្រំដែនលីបង់ ។

បីខែក្រោយពីកំណើតជិវត្តដែលបានបណ្តាលឱ្យប្រជាជនស្លូតត្រង់ ស្លាប់មិនតិចជាងពាពាន់នាក់ ហើយដែល បាឆាអាស់សាដ៍ ចាត់ទុកថា ជាការប្រឆាំងពីបណ្តាជនបះបោរទាំងនេះទៅវិញ ដែលមានប្រមាណ៦ម៉ឺននាក់ ។ គាត់ប្រកាសថា "បណ្តាជនរងគ្រោះ និងស្លាប់ទាំងនេះ សុទ្ធតែជាជនបះបោរនិយមជ្រុល" ពពួកជនទាំងនេះបានបង្កើតថ្លុកឈាមក្នុងប្រទេសរបស់គាត់ ។

នៅពេលគាត់ប្រកាសថា "បានលើកចោលនូវការបំរាមចរាចរ និងប្រកាសអាសន្ន" ជាមួយគ្នានេះគាត់ក៏បង្កើតការបាញ់ និងវាយសម្រុកលើប្រជារាស្ត្រជាថ្មីទៀតដែរ ។ ក្នុងស្ថានភាពអសន្តិសុខនិងជ្រួលច្របល់ដ៏ខ្លាំងទៅៗបំផុតនេះ តើពេលណាទៅដែលគាត់អាចបង្កភាពសមរម្យ ដើម្បីឱ្យមានការបោះឆ្នោតមួយស្របខ្នាតអន្តរជាតិដែលអាចគួរយកបាននោះ ?

តាំងពីណាពីណីមក បាសាអែល អាស់សាដ៍ អាចបង្កើតបាននូវអ្វីៗទាំងអស់នេះ វាពុំអាចជាកំហុសរបស់ឪពុកគាត់មេផ្តាច់ការជំនាន់មុននោះ ឬក៏មកពីក្រុមគ្រួសារបងប្អូនទាំងប៉ុន្មាននោះទេ ។ ផ្ទុយទៅវិញ គឺប្រព័ន្ធគ្រប់គ្រងដ៏ស្អិតរមួតជាមួយកត្តារួមកើតមកពីម៉ាហ្វីយ៉ា និងបក្ខពួកក្លង់ របស់គាត់ក្នុងប្រទេសដែលឈប់ដំណើរការដូចសព្វមួយជងទៀតដែរ ។ ម្យ៉ាងទៀតប្រព័ន្ធនយោបាយដដែលរបស់ស៊ីរីកំពុងទទួលរងឥទ្ធិពលក្នុងតំបន់ពិសេសពីប្រទេសទួកគីជាប់ព្រំដែនស៊ីរីតែម្តង តើទួកគីដែលកំពុងឈានយ៉ាងសង្ហាទៅរកប្រជាធិបតេយ្យ និងការចូលរួមក្នុងសហគមន៍អឺរ៉ុបដោយហ៊ានដើរលើអ្វីៗដែលជាបន្លាសង្គមគេទៀតផង ។

លើផ្នែកភូមិសាស្ត្រនយោបាយតំបន់ដែរនោះ គេឃើញមានតែប្រទេសរុស្ស៊ីទេ ដែលហាក់នៅមានទំនោររក្សាមិត្តភាព និងការពារនយោបាយស៊ីរី បើគេយោងកាលសេចក្តីថ្លែងការដ៏ទន់ជ្រាយដែល

តទៅទំព័រទី ០៩

# គំនិតអ្នកស្រឡាញ់ជាតិមាតុភូមិ និងអ្នកស្អប់ជាតិមាតុភូមិ

ដោយ : ម៉ម យឹន

ពាក្យថា **ជាតិ** មាននិយមន័យយ៉ាងខ្លីថា កំណើត ដូចជាមនុស្សកើតមកមានឈ្មោះថា មនុស្សជាតិ គឺមានដើមកំណើតជាមនុស្សដូចគ្នា.ពាក្យថាពូជសាសន៍ ឬជាតិសាសន៍មានជាតិសាសន៍ជាខ្មែរ ជាតិសាសន៍បារាំងជាតិសាសន៍ចិនជាដើម។ បើជាដើមឈើហៅថា រុក្ខជាតិ គឺមានកំណើតជាដើមឈើ បើជាពពួកត្រីហៅថា មច្ឆាជាតិ គឺមានកំណើតជាត្រីគ្រប់ប្រភេទជាដើម។

**មាតុភូមិ** មាននិយមន័យយ៉ាងខ្លីថា មាតុដូចគ្នា មាតា គឺម្តាយ ឬម៉ែ ភូមិគឺកន្លែង ប្រទេស ឬស្រុកបូកផ្សំគ្នាមកហៅថា មាតុភូមិគឺភូមិកំណើតប្រទេសកំណើត ឬស្រុកកំណើតទុកដូចជាម្តាយបានផ្តល់កំណើតដល់ខ្លួន។

មនុស្សដែលបានកើតមកនៅលើផែនដីទាំង មូលបានចែកចេញជា ជាតិសាសន៍ផ្សេងៗគ្នាជាច្រើនហើយមានពណ៌សម្បុរស្បែកខុសៗគ្នា ខ្លះប្រហាក់ប្រហែលគ្នាមានភាសានិយាយខុសៗគ្នាមានទំនៀមទំលាប់ខុសៗគ្នាមានចិត្តគំនិត ប្រាជ្ញាខុសៗគ្នាដែលចាត់ទុកជាមនុស្សជាតិដូចគ្នាមែន ប៉ុន្តែមានសញ្ជាតិខុសគ្នារហូតដល់មានការប្រកាន់ពូជជាតិសាសន៍ថែមទៀតផង។

ប៉ុន្តែនៅមានចំណុចសំខាន់ៗត្រង់ជាតិពូជសាសន៍នីមួយៗត្រូវតែមានចិត្ត និងគំនិតស្រឡាញ់ពូជសាសន៍ជាតិរបស់ខ្លួនដោយហ្មឹងម៉ាត់ ដែលមានពាក្យមួយថា អ្នកជាតិនិយមមានន័យថា បើគេជាជាតិចិនគេស្រឡាញ់មានចិត្តគំនិតគិតគូរធ្វើអ្វីៗសម្រាប់តែផលប្រយោជន៍ជាតិសាសន៍ចិនរបស់គេតែប៉ុណ្ណោះនេះ ជាលក្ខណៈពិតប្រាកដនិយមរបស់ជាតិពូជសាសន៍នីមួយៗ។

បើសិនជាមានជាតិពូជសាសន៍ណាមួយមិនស្រឡាញ់ជាតិ ពូជសាសន៍របស់ខ្លួនទេ គេឱ្យឈ្មោះថា ជាអ្នកក្បត់ជាតិសាសន៍របស់ខ្លួន។

KhmerPost USA, LLC
East Coast Publication

**Pin Samkhon,**
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* **Loeum Im, Audria Chea,**

*Contributed Writers:*
**Mam Yin, Kim Phien, Lanica Angpak, &**
KhmerPostLowell@gmail.com

**Soben Pin**
*Marketing Director*
KhmerPostUSA@gmail.com
**267-253-3947**
**Sam Khoeun**
*Sales Consultant*
**(781) 244-0522**

*Design Staffs:*
**Leang Heng & Mong Meng**

~~~~~

KhmerPost USA, LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Pennsylvanian & Massachusett.

~~~~

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year. Money order or check is accepted and made payable to:
KhmerPost USA, LLC
438 LINDLEY AVE.
Philadelphia, PA 19120

~~~

The Khmer Post has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009
~~~

# សារទូរលេខសម្ងាត់បង្ហាញពីការយកចិត្តទុកដាក់ ខ្លាំងឡើងលើការធ្វើសមាហរណកម្មចាមម៉ូស្លីម

**ដោយ** ABBY SEIFF

THE CAMBODIA DAILY

សារទូរលេខសម្ងាត់ដែលលេចធ្លាយមួយចំនួនរបស់ស្ថានទូតអាមេរិកបានបង្ហាញថា ដោយភ័យខ្លាចឥទ្ធិពលរបស់ក្រុមអ៊ីស្លាមនិយមជ្រុលពីខាងក្រៅ សហរដ្ឋអាមេរិកនិងរដ្ឋាភិបាលកម្ពុជា បានចំណាយពេលជាច្រើនក្នុងការបន្តគម្រោងការទូតទន់ភ្លន់ ដែលផ្តោតទៅលើការធ្វើឱ្យស្ថានភាពរបស់ប្រជាជនចាមម៉ូស្លីមប្រសើរឡើង។

សារទូរលេខសម្ងាត់មួយនៅខែមិថុនាឆ្នាំ២០០៩ ដែលសរសេរដោយលោកស្រីឯកអគ្គរដ្ឋទូត ខារ៉ូល រ៉តលី មានខ្លឹមសារថា"ក្នុងរយៈពេលមួយឆ្នាំចុងក្រោយនេះស្ថានទូតសហរដ្ឋអាមេរិក បានចាប់ផ្តើមយុទ្ធសាស្ត្រជួយជនម៉ូស្លីមតាមមូលដ្ឋានយ៉ាងសកម្ម"។ គម្រោងទាំងនេះមានតាំងពីការអភិវឌ្ឍន៍ហេដ្ឋារចនាសម្ព័ន្ធនៅក្នុងតំបន់ដែលមានប្រជាជនចាមរស់នៅច្រើនលើសលុប និងការផ្តល់អាហាររូបករណ៍ផ្នែកភាសាអង់គ្លេសរហូតដល់ការបង្កើតទំនាក់ទំនងជាមួយក្រុមមេដឹកនាំម៉ូស្លីម។

កាលពីឆ្នាំ២០០៣ គេបានស៊ើបដឹងថា ជនឈ្មោះ រីឌូអាន អ៊ីសាមូឌីន (Ridua Isamuddin) ឬ ហាំបាលី ដែលជាមេខ្លោងនៃការបំផ្ទុះគ្រាប់បែកនៅកោះបាលីកាលពីឆ្នាំ២០០២នោះ បានរស់នៅក្នុងប្រទេសកម្ពុជាអស់រយៈពេល៦ខែ។ នៅក្នុងឆ្នាំដដែលនោះ វិទ្យាស្ថាន Om-Alqura នៅក្នុងខេត្តកណ្តាល ត្រូវបានបិទទ្វារ បន្ទាប់ពីក្រុមមន្ត្រីបានរកឃើញថា បុគ្គលិករបស់វិទ្យាស្ថាននេះមួយចំនួនជាប់ទាក់ទងនឹងក្រុមជីម៉ាអាស អ៊ីស្លាមីយ៉ាស ដែលជាក្រុមសកម្មប្រយុទ្ធប្រចាំតំបន់។

សារទូរលេខសម្ងាត់ចំនួន៦ ពីឆ្នាំ២០០៦ ដល់ឆ្នាំ២០១០ បានបង្ហាញពីភាពភ័យខ្លាចបណ្តាលមកពីហេតុការណ៍ទាំងនោះ ដែលជំរុញឱ្យទាំរដ្ឋាភិបាលកម្ពុជា និងសហរដ្ឋអាមេរិក បង្កើនកិច្ចប្រឹងប្រែងប្រឆាំងភេរវកម្មរបស់ខ្លួននិងចាប់ផ្តើមកម្មវិធីសមាហរណកម្មមួយចំនួនដែលទាក់ទងនឹងសហគមន៍ចាមនានា។

សារទូរលេខសម្ងាត់ខែមករាឆ្នាំ២០១០ ដែលចុះហត្ថលេខាដោយភារធារី Theodore Allegra បានគូសបញ្ជាក់ថា "រាជរដ្ឋាភិបាលកម្ពុជាបានប្រឹងប្រែងធ្វើសមាហរណកម្មប្រជាជនចាមចូលក្នុងសង្គមឱ្យកាន់តែប្រសើរតាមរយៈការអនុញ្ញាតឱ្យមានការស្លៀកពាក់តាមបែបប្រពៃណីនៅក្នុងសាលាបង្កើតបន្ទប់ សូត្រធម៌មួយនៅព្រលានយន្តហោះ និងបានតែងតាំងប្រជាជនចាមជាច្រើនឱ្យកាន់តំណែងរដ្ឋាភិបាលជាន់ខ្ពស់នានាទៀតផង"។ កិច្ចប្រឹងប្រែងទាំងនោះ និងកិច្ចប្រឹងប្រែងដទៃទៀតទំនងជាផ្តើមចេញពីគោលនយោបាយមួយដែលជំរុញដោយ ស្ថានទូតអាមេរិក ដែលផ្តោតគោលដៅលើប្រជាជនម៉ូស្លីម ដែលងាយទទួលរងនូវឥទ្ធិពលរបស់ក្រុមអ៊ីស្លាមនិយមជ្រុល។

ទោះបីជាការសិក្សាជាច្រើនដែលធ្វើឡើងដោយទីភ្នាក់ងាររដ្ឋាភិបាលសហរដ្ឋអាមេរិក និងទីភ្នាក់ងារឯករាជ្យនានាបានរកឃើញថា ស្ទើរតែគ្មានលទ្ធភាពនៃការកើតមានមូលវិវដ្តនិយមក៏ដោយ ក៏សារទូរលេខសម្ងាត់ទាំងនេះបានចាត់ទុកសហគមន៍ចាមម៉ូស្លីមម្តង ហើយម្តងទៀតថាជាសហគមន៍ ដែលងាយទទួលរងឥទ្ធិពលនេះដោយសារអត្រាដ៏ខ្ពស់នៃភាពក្រីក្រ និងអនក្ខរកម្មគួបផ្សំជាមួយនឹងបញ្ហាអភិបាលកិច្ចមិនចេះចប់នានា ដូចជាអំពើពុករលួយគ្រប់ទីកន្លែងជាដើម។

ពេលខ្លះសារទូរលេខសម្ងាត់ទាំងនេះហាក់ដូចជាបង្ហាញនូវភាពផ្ទុយគ្នារវាងសច្ចភាព និងលទ្ធភាពនៃការកើតមានអ្វីមួយ។

នៅក្នុងសារទូរលេខសម្ងាត់មួយមន្ត្រីស្ថានទូតមួយរូបបានសង្ខេបខ្លឹមសារកិច្ចប្រជុំឆ្នាំ២០០៨មួយជាមួយនឹងគណៈកម្មាធិការប្រឆាំងភេរវកម្មរបស់អង្គការសហប្រជាជាតិយ៉ាងដូច្នេះថា "សមាជិកនានានៃ (ក្រុមប្រឆាំងភេរវកម្ម) យល់ឃើញស្របគ្នាថា ស្ថានភាពនៅក្នុងប្រទេសកម្ពុជាមានភាពស្ងប់ស្ងាត់ជាងគេ ហើយលទ្ធភាពនៃការកើតមានការគំរាមកំហែងភេរវកម្មក៏ស្ថិតនៅក្នុងកម្រិតទាបដែរ"។

ប៉ុន្តែនៅពីរឃ្លាក្រោយ លោកស្រីបែរជាគូសបញ្ជាក់ថា "ក្រុមតំណាងប្រទេសអូស្ត្រាលី អាល្លឺម៉ង់ និងសហរដ្ឋអាមេរិកសំដៅដល់និន្នាការដ៏គួរឱ្យបារម្ភនានាចំពោះភាពនិយមជ្រុលខាងសាសនានៅក្នុងចំណោមប្រជាជនចាមម៉ូស្លីម"៕

# Cables Show Large Interest in Cham Intergration

By Abby Seiff
THE CAMBODIA DAILY

**Fearing incursions by external Islamic fundamentalists, the US and Cambodian governments spent years pursuing soft diplomacy projects focused on improving the status of Cham Muslims, a number of leaked US Embassy cables show.**

"Over the past year, the Embassy has embarked on an aggressive Muslim Outreach strategy," reads a cable by Ambassador Carol Rodley from June 2009. The projects ranged from infrastructure development in Cham-populated areas and scholarships for English classes to building relationships with Muslim leaders.

In 2003, it was discovered that Riduan Isamuddin, or Hambali, mastermind of the 2002 Bali bombing, had lived in Cambodia for six months. The same year, Kandal province's Om-Alqura Institute was closed after officials found that some staff members had links to the regional militant group Jemaah Islamiyah.

A half-dozen cables from 2006 to 2010 suggest a fear borne of those incidents that pushed both the US and Cambodian governments to step up their counterterrorism efforts and undertake a number of integration initiatives involving Cham communities.

"The [government] has also worked to better incorporate the Cham into society by allowing traditional clothing in schools, building a prayer room at the airport and appointing dozens of Cham to high-level government positions," notes a January 2010 cable.

These efforts and others appear to stem from an embassy-driven policy to target a Muslim population with only the scantest vulnerability to influence by fundamentalist groups.

Though multiple studies commissioned by the US government and independent agencies found there was virtually no possibility of radicalization, the cables repeatedly refer to the Cham Muslim community as vulnerable because of high rates of poverty and illiteracy coupled with endemic governance issues such as widespread corruption and weak borders.

At times, the cables appear to reveal a conflict between reality and possibility.

In one, an embassy official summarizes a 2008 meeting with a UN counterterrorism committee saying: "[Counter-Terrorism Action Group] members shared the view that the situation in Cambodia has been relatively calm and the potential threat of terrorism is low."

Just two sentences later, though, she notes: "Australian, German and US reps referred to worrying trends towards fundamentalism in the Cham Muslim population."

ឌឹ ខែមបូឌា ដេលី The Cambodia Daily

ដំណើរប្រែសំរួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខែមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៥ ខែកក្កដា ឆ្នាំ២០១១

# B Meanchey Suit Threatened Over Alleged Land-Grabbing

**By Kuch Naren**
THE CAMBODIA DAILY

Banteay Meanchey provincial hall has threatened to sue a local businessman and a commune councilor in Thma Puok district if the grabbing of a social land concession from more than 80 families continues, officials said yesterday.

The threat came after more than 70 villagers, representing 83 families in Kork Romiet commune's Khoeb Thma village, staged a protest on Tuesday calling for provincial governor Ung Ung Oeun to stop businessman Sok Yoeurn and councilor Hem Sanh from grabbing 114.59 hectares, a provincial hall official said.

Ouk Keorattanak, spokesman and deputy chief of the provincial administration, said the provincial authority was planning to send an intervention letter to district governor Blek Vary, which would inform him that the land was granted by the authorities for agricultural use by the villagers.

The letter ordered the "use of all forces such as police and military police in his jurisdiction to stop the businessman from grabbing the land," Mr Keorattanak said.

"If the district authorities fail to resolve the matter and [Mr Yoeurn] continues to grab land with the backing of officials, we vow to bring a lawsuit to the [provincial] court," he said.

Protestor Buth Chroeng, 49, alleged that Mr Yoeurn sprayed herbicides, damaging eight hectares of rice paddy, and then replanted the land with cassava on May 12. Villagers had attempted but failed to stop Mr Yoeurn and Mr Sanh from destroying further crops, Mr Chroeng said.

Neither Mr Yoeurn nor Mr Sanh could be reached for comment yesterday.

Mr Vary said the land sprayed with herbicide was allegedly outside the concession zone. He said an attempt by the Cadastral Administration and the provincial authorities to demarcate the land had failed, because there was a protest held by another group of villagers and commune councilors who also claimed the land as theirs.

"The dispute occurred because the boundary has yet to be properly set," Mr Vary said, adding that he had asked the authorities to remeasure the land.

# Borei Keila Residents Protest Resettlement Plan

**By Sok Sidorn**
THE CAMBODIA DAILY

More than 120 former residents of Phnom Penh's Borei Keila community held a protest yesterday morning at Prime Minister Hun Sen's Takhmau City residence in Kandal province, continuing their call for the resettlement of displaced families.

Uy Navy, a representative for the protesters, led yesterday's rally.

"About 120 people took part in the protest to seek intervention in getting resettled, as promised by Mr Hun Sen," she said.

The dispute has continued since 2003, when the Borei Keila community was promised housing at an apartment complex built by the Phanimex Company in exchange for giving their land to the developer.

Ms Navy said that there were families who had not received accommodation, and only eight apartment buildings had been completed. "In total, there are 384 families in Borei Keila community who have not got an apartment in buildings 9 and 10 yet. They are poor families.... If there is no resolution, they will protest there until they die," she said.

Pann Sithai, another representative, recalled the history of the resettlement project. "I remember clearly, Hun Sen gave the order for Phanimex Company to build 10 buildings for all 1,776 families.... I appeal to Hun Sen to [build apartments] for all the families. I have heard that from late July, [Phanimex] will evict all the remaining families."

Suy Sophan, chairwoman of Phanimex Company, said the company had received a total figure of 1,382 families that were entitled to apartments, and that the company received this information from the community representatives. She also said the company was currently filling buildings 7 and 8. "My company will call the families who have not received an apartment to attend a lottery session in the coming week. If they are successful, they will be assigned an apartment."

Mann Chhoeun, who was then deputy Phnom Penh governor, said in January 2010 that 10 buildings to house about 1,770 families would be finished "in the coming months."

# ប្រជាជននៅបុរីកីឡាបន្ត ធ្វើការតវ៉ាអំពីលំនៅដ្ឋានថ្មី

**ដោយ : សុខ ស៊ីដន**
THE CAMBODIA DAILY

អតីតប្រជាជនជាង១២០នាក់នៅសហគមន៍បុរីកីឡា ក្នុងក្រុងភ្នំពេញបានធ្វើការតវ៉ាកាលពីព្រឹកម្សិលមិញ នៅឯភូមិគ្រឹះក្រុងតាខ្មៅរបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ក្នុងខេត្តកណ្តាលដោយបន្តការអំពាវនាវ របស់ពួកគាត់សុំឱ្យមានការផ្តល់លំនៅដ្ឋានសម្រាប់ គ្រួសារដែលត្រូវបានផ្លាស់ទីលំនៅ ។

អ្នកស្រី អ៊ុយ ណាវី ជាអ្នកតំណាងរបស់ក្រុម អ្នកតវ៉ាទាំងនេះបានដឹកនាំការជួបជុំគ្នាកាលពីម្សិល មិញ ។ អ្នកស្រីបាននិយាយថា "មនុស្សប្រហែល ១២០នាក់បានចូលរួមនៅក្នុងការតវ៉ានេះ ដើម្បីស្វែង រកការអន្តរាគមន៍ឱ្យមានការផ្តល់លំនៅដ្ឋានដូចដែល សម្តេច ហ៊ុន សែន បានសន្យា" ។

ជម្លោះបានបន្តចាប់តាំងពីឆ្នាំ២០០៣មកពេល ដែលសហគមន៍បុរីកីឡាត្រូវបានសន្យាថានឹងផ្តល់ អគារលំនៅដ្ឋានដែលកំពុងត្រឡប់បានសាងសង់ដោយ ក្រុមហ៊ុនផានអ៊ីម៉ិចជាថ្នូរនឹងការប្រគល់ដីរបស់ពួក គេទៅឱ្យក្រុមហ៊ុនអភិវឌ្ឍន៍នេះ ។

អ្នកស្រី ណាវី បានបន្ថែមថា មានគ្រួសារជាច្រើន ដែលមិនទាន់បានទទួលលំនៅដ្ឋាននៅឡើយ ហើយ មានតែអគារលំនៅដ្ឋាន៨ប៉ុណ្ណោះដែលបានសាងសង់ រួចរាល់ ។ សរុបទៅមានប្រជាជន៣៨៤គ្រួសារនៅ សហគមន៍បុរីកីឡាដែលមិនទាន់បានទទួលលំនៅដ្ឋាន នៅក្នុងអគារទី៩ និងទី១០នៅឡើយ ។

អ្នកស្រីបាននិយាយថា "ពួកគេគឺជាគ្រួសារក្រីក្រ ។ ប្រសិនបើមិនមានដំណោះស្រាយទេ ពួកគេនឹងធ្វើ ការតវ៉ានៅទីនោះរហូតដល់ស្លាប់" ។

តំណាងម្នាក់ទៀតឈ្មោះ ប៉ាន់ ស៊ីថៃ បានរំលឹក ពីប្រវត្តិនៃគម្រោងតាំងលំនៅដ្ឋាននេះឡើងវិញ ។"ខ្ញុំ ចាំបានយ៉ាងច្បាស់ថា សម្តេច ហ៊ុន សែន បានចេញ បទបញ្ជាឱ្យក្រុមហ៊ុនផានអ៊ីម៉ិចសាងសង់អគារចំនួន ១០សម្រាប់ប្រជាពលរដ្ឋទាំង១.៧៧៦គ្រួសារនៅក្នុង សហគមន៍បុរីកីឡា ។ ខ្ញុំសូមអំពាវនាវទៅសម្តេច ហ៊ុន សែន ឱ្យសាងសង់អគារលំនៅដ្ឋានសម្រាប់គ្រួសារ ទាំងអស់នេះ ។ ខ្ញុំបានឮថា ចាប់ពីចុងខែកក្កដាទៅក្រុម ហ៊ុនផាអ៊ីម៉ិចនឹងបណ្តេញគ្រួសារដែលនៅសេសសល់ ចេញ" ។

លោកស្រី ស៊ុយ សុផាន ជាប្រធានក្រុមហ៊ុនផាន-អ៊ីម៉ិចបាននិយាយថា ក្រុមហ៊ុនបានទទួលតួលេខនៃ ប្រជាជនសរុបចំនួន១.៣៨២គ្រួសារដែលមានសិទ្ធិ ទទួលបានលំនៅដ្ឋានហើយថា ក្រុមហ៊ុនបានទទួល ព័ត៌មាននេះពីអ្នកតំណាងសហគមន៍នេះ ។ អ្នកស្រី ក៏បាននិយាយដែរថា បច្ចុប្បន្នក្រុមហ៊ុនកំពុងសាង សង់បញ្ចប់អគារទី៧ និងទី៨ ។ "ក្រុមហ៊ុនរបស់ខ្ញុំនឹង ហៅគ្រួសារដែលមិនទាន់បានទទួលលំនៅដ្ឋានឱ្យចូល រួមការចាប់ឆ្នោតនៅសប្តាហ៍ខាងមុខនេះ ។ ប្រសិន បើពួកគេចាប់ឆ្នោតបានពួកគេនឹងទទួលបានលំនៅដ្ឋាន មួយល្វែង" ។

លោក ម៉ាន់ ឈឿន កាលនៅជាអភិបាល រងក្រុងភ្នំពេញបាននិយាយកាលពីខែមករា ឆ្នាំ ២០១០ ថា អគារចំនួន១០សម្រាប់ប្រជាជនប្រហែល១.៧៧០ គ្រួសារនឹងត្រូវសាងសង់បញ្ចប់"ក្នុងរយៈពេលប៉ុន្មាន ខែខាងមុខនេះ" ៕

# អ្នកជំនួញ និងក្រុមប្រឹក្សាឃុំត្រូវបាន គំរាមជាមួយនឹងរឿងក្តីចាប់យកដី

**ដោយ គុជ ណារ៉ែន**
THE CAMBODIA DAILY

ក្រុមមន្ត្រីបាននិយាយកាលពីម្សិលមិញថា សាលាខេត្ត បន្ទាយមានជ័យបានគំរាមប្តឹងអ្នកជំនួញក្នុងស្រុកម្នាក់ និង ក្រុមប្រឹក្សាឃុំមួយរូបនៅស្រុកថ្មពួកប្រសិនបើការចាប់យកដីសម្បទានសង្គមកិច្ច ពីប្រជាជនចំនួនជាង៨០គ្រួសារនៅតែបន្ត ។

មន្ត្រីមួយរូបនៅសាលាខេត្តបាននិយាយថា ការគំរាម បានកើតមានឡើងក្រោយពីអ្នកភូមិចំនួនជាង៧០រូប ដែលតំណាងឱ្យ៨៣គ្រួសារនៅភូមិកើបថ្ម ឃុំគោករមៀត បានធ្វើការតវ៉ាកាលពីថ្ងៃអង្គារ ដោយអំពាវនាវឱ្យលោក អភិបាលខេត្ត អ៊ុង អឿន បញ្ឈប់អ្នកជំនួញឈ្មោះ សុខ យឿន និងក្រុមប្រឹក្សាឃុំឈ្មោះ ហែម សាញ់ ពីការចាប់ យកដីទំហំ១១៤.៥៩ ហិចតា ។

លោក អ៊ុក កែវរតនៈ អ្នកនាំពាក្យ និងជាអនុប្រធាន រដ្ឋបាលខេត្តបានមានប្រសាសន៍ថា អាជ្ញាធរខេត្តមានផែន ការបញ្ជូនលិខិតអន្តរាគមន៍មួយច្បាប់ ជូនលោក ផ្លេក វ៉ារី អភិបាលស្រុក ដើម្បីជូនដំណឹង ដល់រូបគាត់ថា ដីនោះត្រូវ បានផ្តល់ដោយអាជ្ញាធរ ដើម្បីឱ្យអ្នកភូមិធ្វើកសិកម្ម ។

លោក កែវ រតនៈ បានមានប្រសាសន៍ថា លិខិត នេះបញ្ជា"ឱ្យប្រើប្រាស់គ្រប់កម្លាំងទាំងអស់ដូចជានគរ បាលកងរាជអាវុធហត្ថ ដែលស្ថិតក្រោមអំណាចរបស់ លោក ដើម្បីបញ្ឈប់ឈ្មួញរូបនេះ ពីការចាប់យកដី" ។

លោកបានមានប្រសាសន៍ថា "ប្រសិនបើអាជ្ញាធរ ស្រុកបរាជ័យក្នុងការដោះស្រាយបញ្ហានេះ ហើយ(លោក យឿន)នៅតែបន្តចាប់យកដី ដោយមានបង្អែកពីក្រុម មន្ត្រីនោះយើងនឹងប្តឹងទៅសាលាដំបូង(ខេត្ត)" ។

អ្នកតវ៉ាមួយរូបឈ្មោះ ប៊ុត ជ្រឹង អាយុ៤៩ឆ្នាំ បាន ចោទថា លោក យឿន បានបាញ់ថ្នាំឱ្យងាប់ស្មៅដោយធ្វើ ឱ្យខូចដំណាំស្រូវអស់៨ហិចតា ហើយបន្ទាប់មកបានដាំ ដំឡូងមីនៅលើដីនោះកាលពីថ្ងៃទី១២ ខែឧសភា ។

លោក ជ្រឹង បានមានប្រសាសន៍ថា ក្រុមអ្នកភូមិ បានប៉ុនប៉ងដោយបរាជ័យក្នុងការបញ្ឈប់លោក យឿន និងលោក សាញ់ ពីការបំផ្លិចបំផ្លាញដំណាំផ្សេងៗទៀត ។

គេមិនអាចទាក់ទងលោក យឿន និងលោក សាញ់ ដើម្បីធ្វើអត្ថាធិប្បាយបានទេ កាលពីម្សិលមិញនេះ ។

លោក វ៉ារី បានមានប្រសាសន៍ថា ដីដែលត្រូវ បានបាញ់ថ្នាំឱ្យងាប់ស្មៅនោះតាមចោទថា ស្ថិតនៅក្រៅ តំបន់សម្បទាន ។ លោកបានមានប្រសាសន៍ថា ការប៉ុន ប៉ងមួយរបស់រដ្ឋបាលសុរិយោដី និងអាជ្ញាធរខេត្តដើម្បី កំណត់ព្រំដីបានទទួលបរាជ័យ ពីព្រោះមានការតវ៉ាមួយ ដែលធ្វើឡើងដោយអ្នកភូមិ និងក្រុមប្រឹក្សាឃុំមួយក្រុម ផ្សេងទៀតដែលបានអះអាងថាដីនោះជាដីរបស់ពួកគេដែរ ។

លោក វ៉ារី បានមានប្រសាសន៍ថា "ជម្លោះបាន កើតមានឡើង ពីព្រោះព្រំដីនៅពុំទាន់បានកំណត់ឱ្យបាន ត្រឹមត្រូវនៅឡើយ"ដោយបន្ថែមថា លោកបានស្នើទៅ អាជ្ញាធរឱ្យធ្វើការវាស់វែងដីនោះឡើងវិញ ៕

តមកពីទំព័រទី ៤

## ប្រទេសស៊ីរី : "ម្ចាស់ស្រមោលសង្គ្រាម...

សហគមន៍អឺរ៉ុប និងស.រ.អា ត្រូវបានបង្ខំខ្លួនធ្វើនៅពេលដែលការកាប់សម្លាប់រង្គាលកំពុងមានដំណើរការណ៍ទៅមុខទៀត តាំងពីពេលនោះមកសព្វថ្ងៃ ។ រីឯទីក្រុង រីយ៉ាដ៍ RYAD ARABIE SEOUDIE វិញ គេហាក់ដូចជា ពុំចង់ឱ្យមានការជ្រួលច្របល់ដូចយ៉ាងបដិវត្តណាមួយកើតឡើងក្នុងតំបន់ទេ ។ ថ្វីត្បិតខ្លួនមានទំនាស់ជាមួយ SYRIE យ៉ាងណាក៏ដោយ ។ វាក៏ដូចគ្នាជាមួយក្រុងតេអេរ៉ង់ដែរ ។ RYAD បារម្ភភ័យក្រែងក្រុង DAMAS SYRIE នៅតែបន្តបញ្ជូនទ័ពសម្ងាត់ហ្ស៊ីអាដ៏ឌីស្ទ JIHADISTES ឆ្លងកាត់ RYAD ឆ្ពោះទៅ IRAN ដែលមានតាំងពី ២០០ឆ្នាំមកម្ល៉េះ ។ តើស៊ីរីបន្តការព្រងើយកន្តើយ អ.ស.ប ដើម្បីបំពេញឱកាសនឹងត្រៀមបង្កើតយុទ្ធវិធីចាស់នៃ"សង្គ្រាមត្រជាក់" ។ រវាងប្លុករុស្ស៊ី (កុម្មុយនីស្ត URSS ) និងលោក សេរី ឬយ៉ាងណា ? គេនៅចាំបានថា BACHAR EL ASSAD កើតក្នុងគ្រួសារដែលមាននិកាយស៊ីអ៊ីត (CHIISME ) ដែលជាសាសនាភាគតិចបំផុតនៅស៊ីរី ក្រោមនិកាយ SUNNITES ដែលស្ថិតជាមួយក្រុងរីយ៉ាដ៍ ។ នៅពេលតែមួយរបបផ្តាច់ការពីរមានគម្លៃនយោបាយខុសគ្នា ! ៕

# Yoo's Auto Service and Collision



## យូ បំរើសេវារថយន្ត
នឹងរថយន្តគ្រោះថ្នាក់ប៉ះទង្គិច

**FREE ESTIMATES**

យើងអាចជួសជុលរថយន្តដ៏មានតម្លៃរបស់លោកអ្នក ឱ្យបានប្រសើរបំផុត ដើម្បីសុវត្ថិភាពលោកអ្នក មិនឱ្យខុសចិត្តឡើយ ។

**ពេទ្យជាងម៉ាស៊ីន**
- Check Engine Light Diagnostic
- Electronic Wheel Alignment
- Certified Enhanced Emission Inspection & Repairs
- Muffler & More

**ពេទ្យជួសជុលតួរថយន្ត**
- Expert Body Work
- Fender & Paint Work
- Frame Straightening
- Insurance Specialists




**189 W. Duncannon Ave. Phila., PA 19120**

ទូរស័ព្ទរក SAM 215-457-7777 ឬ 215-457-7779, Fax-215-457-7475

# ភោជនីយដ្ឋាន ឆាយណាស្តារ
## China Star




មានម្ហូបចិន
ម្ហូបប៉ូលីណេស៊ី
ម្ហូបចិនកាំតុង
ម្ហូបម៉ង់ដារិន

Chinese -Polynesian -Cantonese -Mandarin
369 Broadway St., Lowell, MA 01854
Tel: 978-454-7578, 978-454-7507

Open Daily: Sun. to Thurs. 11:00 AM to 1:00 AM
Fri. and Sat. 11:00 AM to 3:00 AM



**យើងអាចយកម្ហូបទៅដល់ផ្ទះបាន**

We Deliver All Day: 11:30 AM to 1:00 AM Available to most areas. Min. $10.00 Delivery Charge $2

**$17.99**

**បង្កងឆាខ្ទឹម និងខ្ញីពិសេស**

SPECIAL 2 Lobsters w/ Scallion & Ginger




សូមអញ្ជើញមកលំហែរអារម្មណ៍ កំចាត់ភាពអាប់អួរ!

# ភេសជ្ជៈដ្ឋាន ហ្វៀ

*Bar's Open*
*Monday-Saturday*
*10a.m.–2a.m.*
*Sunday*
*11a.m.–2a.m.*

**198 W. Godfrey Avenue.**
**(Corner of Godfrey & 2nd St.)**



Philadelphia, PA 19120
**215-621-7563**

# ហាងមាសខ្មែរអង្គរ
# KHMER ANGKOR JEWELRY

**Since 1983**

Certified Diamonds & Diamond Jewelry



18K & 24K Gold, Platinum Jewelry & Watches
GIA Graduate Gemologist on Staff
Authorized RADO & LONGINES Dealer
Repairs Done on Premises

**Open**
**Tuesday-Sunday**
**10:30AM-6:30PM**
**Closed Monday**

600 Washington Avenue. Unit 12B. Philadelphia, PA 19147
Tel. 215-599-2222 Fax. 215-599-2223

## តមកពីទំព័រទី ៩ គំនិតអ្នកស្រឡាញ់ជាតិមាតុភូមិ...

**តទៅទំព័រទី១១**

នៅពេលណាជាតិសាសន៍បានកើតមករស់នៅលើភូមិស្រុក ប្រទេសណាកន្លែងនោះឈ្មោះថា មាតុភូមិ ឬមាតុប្រទេសរបស់ជាតិសាសន៍នោះ ហើយត្រូវបានចាត់ទុកថា ម្តាយឬម៉ែបានផ្តល់កំណើតដល់ខ្លួននោះដែរ ។ ដូច្នេះបើកាលណាជាតិសាសន៍នោះ មិនស្រឡាញ់មាតុភូមិរបស់ខ្លួនទេជាតិសាសន៍នោះមានឈ្មោះថា អ្នកក្បត់មាតុភូមិ ។

ផ្ទុយទៅវិញ នៅលើផែនដីនៃសកលលោកសព្វថ្ងៃដែលមានជីវិតមនុស្សមានជាតិសាសន៍ខុសៗគ្នាកំពុងតែរស់នៅមានចំនួនសរុបជាច្រើនពាន់លាននាក់ កំពុងតែស្ថិតនៅក្នុងបញ្ហាវិបត្តិយ៉ាងធ្ងន់ធ្ងរដែលកើតចេញមកពីមេដឹកនាំនៃប្រទេស និងប្រជាជាតិពូជសាសន៍នីមួយៗដែលជាបុគ្គលមានចិត្តគំនិតប្រព្រឹត្តអំពើ ដែលផ្ទុយស្រឡះពីច្បាប់ធម្មជាតិនិងច្បាប់និតិរដ្ឋដែលជាតិសាសន៍នីមួយៗបានបង្កើតមកដោយខ្លួនឯងនោះ ។

របៀបដូចជានៅក្នុងប្រទេសខ្មែរសព្វថ្ងៃ បើគិតតាមប្រវត្តិសាស្ត្រជាជាតិសាសន៍មួយមានឬទ្ធានុភាពខ្លាំងក្លាណាស់ឯខាងសតិបញ្ញា សតិស្មារតីសតិសម្បជញ្ញៈក្នុងការស្ថាបនាកសាងប្រទេសជាតិមាតុភូមិរបស់ខ្លួនដូចជាមានបន្សល់ទុកនូវស្នាដៃវណ្ណកម្មជាប្រាង្គប្រាសាទសិលាទាំងធំទាំងតូចចំនួនរាប់ពាន់ស្ថិតនៅលើពាសពេញមាតុភូមិរហូតមកដល់សព្វថ្ងៃ ជាភស្តុតាងស្រាប់ ។

ដោយសារតែមានអយោនិសោមនសិការ គឺការមិនពិចារណាដោយឧបាយ ឬដោយគំនិតទៀងទាត់ល្អិតល្អន់ និងមិនយកចិត្តទុកដាក់ទើបបណ្តាលឱ្យមាតុភូមិដែលមានមេដឹកនាំប្រកបដោយអំពើអយោនិសោមនសិការបានបង្កើតឱ្យមានសភាពវឹកវរជ្រួលច្របល់ចលាចលនៅក្នុងតំបន់និងទ្វីបនីមួយៗជារៀងរាល់ថ្ងៃ ។

សូមលើកយកឧបទ្ទវហេតុខ្លះ ដូចជានៅទ្វីបអាហ្វ្រិកមានប្រទេសយ៉េម៉ែន ប្រទេសស៊ូដង់ ប្រទេសកូឌីវ័រជាដើមនៅក្រុមប្រទេសអារ៉ាប់មានប្រទេស អេហ្ស៊ីប ទុយនេស៊ី លីប៊ីជាដើម ប្រទេសចិន ប្រទេសកូរ៉េ ប្រទេសយួន ប្រទេសសៀម ប្រទេសខ្មែរជាដើម និងមានប្រទេសជាច្រើនទៀត ដែលកំពុងតែស្ថិតនៅក្នុងស្ថានភាពវឹកវរច្រួលច្របល់ដល់ជាតិសាសន៍រៀងៗខ្លួន ឱ្យបានជីវិតរស់នៅក្នុងសភាពមិនប្រក្រតី ។

បញ្ហាវិបត្តិនយោបាយយ៉ាងធ្ងន់ធ្ងរនៅតាមប្រទេស និងនៅតាមជាតិសាសន៍នីមួយៗនេះ បើតាមការពិតវាជាបញ្ហាដែលបង្កបង្កើតឡើងគឺដោយសារតែមេដឹកនាំប្រទេសជាតិខ្លះមានផែនការជាអំពើមហិច្ឆិតាលោភលន់ចង់បានដោយគ្មានកំណត់ព្រំដែន រហូតដល់សមាជិករំលោភឈ្លានពានរុករានទន្ទ្រានទៅចាប់យកប្រទេសជាតិសាសន៍ដទៃដោយគ្មានខ្លាចកោតញញើតដល់សន្ធិសញ្ញាកិច្ចព្រមព្រៀងអន្តរជាតិ ដែលខ្លួនឯងបានចុះហត្ថលេខាយល់ព្រមនោះដែរ សោះឡើយ ។

ភស្តុតាងដូចជាមេដឹកនាំប្រទេសសៀម និងប្រទេសយួនកុម្មុយនិស្តចាប់តាំងពីសតវត្សទី១៣មកបានបង្កើតសង្គ្រាមវាយលុកលុយដណ្តើមយកទឹកដីខ្មែរជាបន្តបន្ទាប់រហូតមកដល់សព្វថ្ងៃក៏ជាតិសាសន៍ទាំងពីរនៅតែបន្តផែនការពង្រីងទឹកដីនេះជាដដែលទៀតផង ។

ចំណែកក្រុមមេដឹកនាំខ្មែរមួយក្តាប់តូចតាម ការពិតត្រូវតែប្តេជ្ញាតាំងចិត្តចាត់ទុកខ្លួនថាជាជាតិសាសន៍ខ្មែរអ្នកជាតិនិយមខ្លាំងក្លាពិតប្រាកដ មិនត្រូវទៅចូលរួមចិត្តរួមគំនិតរួមដៃជាមួយជាតិសាសន៍ដទៃដោយបណ្តោយគេឱ្យចូលមករំលោភឈ្លានពានរុករានទន្ទ្រានយកជាតិមាតុភូមិនិងជាតិសាសន៍ខ្មែរខ្លួនឯងដូច្នេះទេ ទើបចាត់ទុកថា ជាក្រុមមេដឹកនាំមានឧត្តមគតិមនសិការជាជាតិខ្មែរអ្នកជាតិនិយមពិតប្រាកដមែន ។

នៅមានបញ្ហាសំខាន់ម្យ៉ាងទៀត ជាមូលហេតុធំបំផុតដែលបណ្តាលមេដឹកនាំជាតិសាសន៍សៀម យួន ចិន កូរ៉េ ជាដើមនេះ ដែលគេត្រូវតែចាត់ទុករុកឆ្កិសឆ្កៀលបំបែកបំបាក់កុំឱ្យជាតិពូជសាសន៍ខ្មែរមានធមិសាមគ្គីរូបរួមស្រឡាញ់គ្នាជាជាតិសាសន៍ខ្មែរតែមួយនោះឡើយ ពីព្រោះធមិសាមគ្គីរូបរួមដ៏រឹងមាំនេះហើយ គឺជាប្រភពដើមធំបំផុតនៃជោគជ័យក្នុងការពង្រឹង និងពង្រីកកម្លាំងការពារទ្រទ្រង់ជាតិសាសន៍ និងមាតុភូមិរបស់ជាតិសាសន៍នីមួយៗនោះ ។

ពីមួយសតវត្សទៅមួយសតវត្សបានកន្លងផុតទៅគេសង្កេតឃើញជាតិសាសន៍ខ្មែរ ជាពិសេសក្រុមមេដឹកនាំដែលមានឋានៈជាស្តេចផែនដីក្តីជានាយករដ្ឋមន្ត្រីគ្រប់តំណែងក្តីជាមហាឧត្តមសេនីយ៍ និងឧត្តម សេនីយ៍ក្តីជាមហាឧកញ៉ា និងឧកញ៉ាក្តី សុទ្ធតែបានថ្លែងប្រកាសចាត់ទុកខ្លួនឯងថា មានឧត្តមគតិមនសិកា សតិស្មារតីស្នេហាមាតុភូមិ និងជាតិសាសន៍ខ្មែរ បើទោះបីជារហូតមកដលសព្វថ្ងៃនេះទឹកដីខ្មែរត្រូវរួមតូចបន្តិចម្តងៗ ហើយត្រូវគេសម្លាប់ផ្តាច់ពូជសាសន៍បន្តិចម្តងៗក៏ក្រុមមេដឹកនាំខ្មែរទាំងអស់នេះ ពុំដែលមានចិត្តក្លាហានថ្លែងសារភាពពីកំហុសរបស់ខ្លួនម្តងណាសោះឡើយ ។ ផ្ទុយទៅវិញក្រុមមេដឹកនាំនិងមន្ត្រីគ្រប់ លំដាប់ថ្នាក់បានប្រើអំណាចផ្តាច់ការយ៉ាងឃោរឃៅសាហាវព្រៃផ្សៃបំផុតមកលើជាតិសាសន៍ខ្មែរខ្លួនឯងទៅវិញដោយឥតមានធមិមេត្តាត្រាប្រណីសោះឡើយ ។ ក្នុងសម័យកាលក្រោយឆ្នាំ១៩៥៣មកដល់ឆ្នាំ២០១១នេះ អស់រយៈពេលជាង៥៨ឆ្នាំបានឱ្យឃើញ និងយល់ដឹងថា ជាតិសាសន៍និងមាតុភូមិខ្មែរត្រូវបានទទួលរងនូវគ្រោះថ្នាក់មហន្តរាយយ៉ាងច្រើនខ្លាំងណាស់មិន តែប៉ុណ្ណោះសេចក្តីថ្លែងអួតអាងនៃក្រុមមេដឹនាំសម័យនេះ ចាត់តាំងខ្លួនឯងថាជាក្រុមមេដឹកនាំមានប្រាជ្ញាឆ្លៀវឆ្លាតខ្លាំងណាស់មានសតិស្មារតីស្នេហាមាតុភូមិខ្លាំងណាស់ពុំដែលមានទេនៅក្នុងប្រវត្តិសាស្ត្រខ្មែរពីមុន ។ ឥឡូវនេះក្រុមមេដឹកនាំនេះ កំពុងតែមានឫទ្ធានុភាពខ្លាំងក្លាដូចគ្នាស្តេចខ្មែរព្រះនាមជ័យវរ្ម័ទី៧សម័យអង្គរនោះដែរ ។

បើសិនជាពិតដូច្នេះមែនគួរណាស់តែបណ្តាមហាជនជាតិសាសន៍ខ្មែរ ត្រូវតែសប្បាយរីករាយមានបាយម្ហូបអាហារនុំចំណីបរិភោគគ្រប់គ្រាន់មានមន្ទីរពេទ្យថ្នាំព្យាបាលជំងឺគ្រប់គ្រាន់មានសិទ្ធិសេរីភាពពេញបរិបូរណ៍ និងមានមាតុភូមិជាកម្មសិទ្ធិរបស់ខ្លួនពិតប្រាកដគ្រប់ៗគ្នាអស់ហើយ ។

ប៉ុន្តែតាមការពិតអ្វីៗដែលក្រុមមេដឹកនាំកាន់អំណាចខ្មែរកំពុងប្រព្រឹត្ត ធ្វើគឺជាអំពើផ្ទុយគ្នាស្រលះ មានន័យថា ស្នេហាជាតិណាស់គឺក្បត់ជាតិណាស់ការរីកចំរើនលូតលាស់ គឺលួតលាស់ណាស់ខាងការបំផ្លិចបំផ្លាញសម្បត្តិធម្មជាតិគ្រប់ប្រភេទ ខាងសម្លាប់ជាតិសាសន៍ឯង និងការបង្កើតអំពើពុករលួយទុចរិតគិតតែប្រមែប្រមូលលុយកាក់ទ្រព្យសម្បត្តិឱ្យបានទុកជាផលប្រយោជន៍ផ្ទាល់ខ្លួនគ្រួសារខ្លួននិងបក្សពួក ខ្លួនតែប៉ុណ្ណោះ ។

ដោយសារតែអំពើប្រព្រឹត្តដ៏សែនស្មោគគ្រោករកគ្មានទេ ក្នុងលោកដូច្នេះហើយ ទើបបណ្តាលឱ្យមាន

(មានតទៅលេខក្រោយ)

# Vihi Insurance-Income Tax Mortgage-Realty

**ធានារ៉ាប់រង_ពន្ធលើប្រាក់ចំណូល_ខ្ចីប្រាក់ទិញផ្ទះ_ទិញលក់ផ្ទះ**

**Insurance ធានារ៉ាប់រង**
(Licensed PA, NJ & DE) អាជ្ញាប័ណ្ណ PA, NJ & DE
Home • ផ្ទះ Car • រថយន្ត
Business • មុខរបរ Health • សុខភាព

**Income Tax ពន្ធលើប្រាក់ចំណូល**
Individual • ផ្ទាល់ខ្លួន Business • ពីមុខរបរ
Pay Roll • ពីប្រាក់ខែ
Forming New Business • បង្កើតមុខជំនួញថ្មី
Home Deed Transfer • ប្តូរឈ្មោះផ្ទះ
Auto Title Transfer • ប្តូរឈ្មោះម្ចាស់រថយន្ត

Mon.-Fri.: 10 am-6pm . Sat: 11 am-3pm

INCOME TAX
Auto Home Business Life

**Vihi Mortgage Vihi ខ្ចីប្រាក់ទិញផ្ទះ**
(Licensed by PA Dept. of Banking) • អាជ្ញាប័ណ្ណពី PA ការិយាល័យធានាគារ
Hiep Vo, MBA, President. • ហៀប វ៉ូ MBA ប្រធាន
Finance/Refinance your home • ផ្តល់ប្រាក់កម្ចីក្នុងការទិញផ្ទះទិញដំបូង ឬកណ្តាលទី
Low interest Rate & Down Payment • ការប្រាក់ថោក និងលុយកក់តិច
Fast Preapproval • ចម្លើយលឿន

**Vihi Realty Co**
Dr. Hanh Vo, Broker/Owner Cell (267) 664-2689
Buy & Sell Properties & Businesses
Visit: www.drhanh.net for more foreclosure homes

North Phila – 215-276-8441
5225 N. 5th Street
Phila., Pa 19120

South Phila – 215-336-0600
1519 W. Passyunk Ave.
Phila., Pa 19145
www.vihifinancial.com

# ហាងមាសរស្មី

**SUNSHINE JEWELRY, INC.**
**215-271-2950**

Certified Diamonds & Golds (24K & 18K)
Men & Women Jewelries & Watches
Custom Design & Repairs on Premise
15 Years in Services & Growing Strong

SUNSHINE

702 Washington Ave. Phila., PA 19147
www.sunshinejewelryonline.com

# Phở Hà Saigon

## Vietnamese Restaurant

**7 days A Week 9am-9pm**

B.Y.O.B.

ជាហាងដែលធ្វើ ហ្វើ ឆ្ងាញ់ជាងគេនៅហ្វីឡាដែលហៅ
ចុងភៅដែលពូកែធ្វើ ហ្វើ និងម្ហូបផ្សេងៗឯទៀត
ត្រូវមាត់ភ្ញៀវគ្រប់ៗរូប ឥឡូវនេះមកធ្វើម្ហូបនៅហាងយើងខ្ញុំ
ហើយធានាថា ម្ហូបអាហារហាង Phở Hà Saigon
និងបំរើលោកអ្នកបានយ៉ាងពេញចិត្តគ្រប់ពេលវេលា

320 W. Oregon Avenue, Suite 1. Philadelphia, PA 19147
Tel: (215) 389-1002 (Inside Oregon Market)

VISA MasterCard DISCOVER NETWORK

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៥ ខែកក្កដា ឆ្នាំ២០១១

# Cables Show Hun Manet's Tough Border Stance

BY ZSOMBOR PETER
THE CAMBODIA DAILY

Belying his low-key public persona, leaked US Embassy cables released this week portray Prime Minister Hun Sen's eldest son, the RCAF commander Hun Manet, as a tough contrarian on Thai-Cambodian relations, sometimes defying the embassy's expectations.

In an August 2008 cable released by WikiLeaks about outgoing US Ambassador Joseph Mussomeli's farewell lunch with Mr Manet, who then held the rank of brigadier general, the pair traded their thoughts on Cambodia's evolving border relations with Thailand following the incursion of Thai troops into land surrounding Preah Vihear temple.

Only the month before, when it was backed by a friendly—if weak—government in Bangkok under pressure from its own military, Cambodia had successfully lobbied the World Heritage Committee to add Preah Vihear to its list of historic sites.

According to the cable, Mr Manet expressed concern that Cambodia's peaceful response to the Thai incursions was sending Bangkok the wrong signal.

"He gave his view that Cambodian patience and its refusal to use force have been interpreted by Thailand as weakness," the ambassador wrote in the cable.

"Manet noted that the deployment of Thai troops around Preah Vihear was recently followed by deployments of more Thai forces in other disputed terrain...and that this may have been a direct result of Cambodia not taking a tough stance," the cable continued.

In the exchange, Mr Mussomeli reminded Mr Manet that Thailand had just agreed to a withdrawal, in principle, of its forces.

"In principle," the premier's son replied to the ambassador.

"The Thai, [Mr Manet] insisted, see no downside in resisting a peaceful solution and they can use the tension with Cambodia to distract their citizens from more pressing domestic concerns," the ambassador recounted in the cable.

Mr Mussomeli urged patience and advised Mr Manet that Cambodia's thoughts of taking its grievances to the UN Security Council were premature.

At the end of the cable, though, the embassy sounded surprised at Mr Manet's tough posture regarding Thailand.

"Given the recent downplaying of the Preah Vihear issue in the Cambodian press and the efforts of both governments to agree—even if only in principle—to withdraw military forces from the disputed territory, Manet's comments were somewhat unexpected," the ambassador observed.

In the end, the two sides never did withdraw their troops. Two months later, a brief clash left two Cambodian soldiers dead, and a new, military-friendly government soon took over in Bangkok. Thai and Cambodian troops have remained stationed at the border since, and have engaged numerous times in ever greater deadly clashes.

Meanwhile, the premier's eldest son has continued his rise through the military ranks, fueling speculation of his grooming for top leadership.

Mr Manet was promoted to major general in January, only months after being named deputy commander of the Prime Minister's Bodyguard Unit and deputy chairman of the RCAF Joint Staff. He was already commander of the National Counterterrorism Task Force.

Major General Manet graduated from the US Military Academy of West Point in 1999, the first Cambodian to do so. He then went on to earn a Masters degree at New York University.

During a graduation ceremony in Phnom Penh yesterday, Mr Hun Sen commented on that scholarship and another US scholarship for his son Hun Many. Mr Many received a $175,000 scholarship from the US' National Defense University to attend its 2009-2010 academic year.

"I did not ask to have them go, but the US wanted them to go there," the prime minister said. "I want to verify this, because as a habit, I don't ask for it. If you give or not, it is OK. Anyway, I thank them for letting my sons study," he added.

*(Additional reporting by Phorn Bopha)*

តមកទំព័រទី ០១

# សារទូរលេខសម្ងាត់បង្ហាញពីគោល..

ឯកអគ្គរដ្ឋទូតរូបនេះបានសរសេរនៅក្នុងសារទូរលេខសម្ងាត់នេះថា "គាត់បានបញ្ចេញទស្សនៈថា ការអត់ធ្មត់របស់កម្ពុជា និងការបដិសេធមិនប្រើប្រាស់កងកម្លាំងរបស់ខ្លួនត្រូវបានថៃចាត់ទុកថាជាភាពកំសាកទៅវិញ"។

សារទូរលេខសម្ងាត់នេះបន្តថា "លោក ហ៊ុន ម៉ាណែត បានគូសបញ្ជាក់ថា បន្ទាប់ពីបានដាក់ពង្រាយកងទ័ពថៃនៅជុំវិញប្រាសាទព្រះវិហារ ថៃបានដាក់ពង្រាយកងទ័ពបន្ថែមទៀតនៅពេលថ្មីៗនេះ នៅក្នុងទឹកដីមានវិវាទផ្សេងៗទៀត ហើយថាប្រការនេះ ប្រហែលជាដោយសារតែកម្ពុជាមិនបានប្រកាន់គោលជំហរមាំ"។

នៅក្នុងការផ្លាស់ប្តូរយោបល់គ្នានេះ លោក ចូសេហ្វ មូសូម៉េលី បានក្រើនរំលឹកលោក ហ៊ុន ម៉ាណែត ថាប្រទេសថៃទើបតែបានយល់ព្រមដកកងកម្លាំងរបស់ខ្លួនចេញជាគោលការណ៍។

កូនប្រុសរបស់លោកនាយករដ្ឋមន្ត្រីរូបនេះ បានឆ្លើយតបទៅឯកអគ្គរដ្ឋទូតរូបនេះវិញថា "ជាគោលការណ៍"។ ឯកអគ្គរដ្ឋទូតរូបនេះបានលើកឡើងនៅក្នុងសារទូរលេខសម្ងាត់នេះថា "(លោក ហ៊ុន ម៉ាណែត) បានទទូចថា ថៃមើលមិនឃើញពីផលអវិជ្ជមានពីការរារាំងដំណោះស្រាយដោយសន្តិវិធីទេ ហើយពួកគេអាចនឹងប្រើប្រាស់ភាពតានតឹងជាមួយ កម្ពុជានេះដើម្បីបង្វែរការចាប់អារម្មណ៍របស់ពលរដ្ឋខ្លួនពីកង្វល់ដែលធំជាង និងបន្ទាន់ជាងនៅក្នុងប្រទេសខ្លួន"។

លោក ចូសេហ្វ មូសូម៉េលី បានជំរុញឱ្យមានការអត់ធ្មត់ ហើយបានផ្តល់យោបល់ដល់លោក ហ៊ុន ម៉ាណែត ថាគំនិតរបស់កម្ពុជាក្នុងការនាំយកបញ្ហានេះទៅឱ្យក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិដោះស្រាយនោះមានភាពក្មេងខ្ចីណាស់។

ទោះជាយ៉ាងណា នៅចុងបញ្ចប់នៃសារទូរលេខសម្ងាត់នេះស្ថានទូតនេះហាក់ដូចជា មានការភ្ញាក់ផ្អើលចំពោះអាកប្បកិរិយាប្រកាន់មាំរបស់លោក ហ៊ុន ម៉ាណែត ចំពោះប្រទេសថៃ។

ឯកអគ្គរដ្ឋទូតរូបនេះបានសម្តែងនូវការសង្កេតឃើញរបស់លោកថា "បើគិតពីការនិយាយសម្រាលនាពេលថ្មីៗនេះអំពីបញ្ហាប្រាសាទព្រះវិហារនៅក្នុងប្រព័ន្ធផ្សព្វផ្សាយរបស់កម្ពុជា និងកិច្ចប្រឹងប្រែងរបស់រដ្ឋាភិបាលទាំងពីរក្នុងការឈានដល់ការព្រមព្រៀងដកកងកម្លាំងយោធាចេញពីទឹកដីមានវិវាទនេះ បើទោះជាគ្រាន់តែជាគោលការណ៍ក៏ដោយនោះ ការអត្ថាធិប្បាយរបស់លោក ហ៊ុន ម៉ាណែត គឺគួរឱ្យភ្ញាក់ផ្អើលបន្តិចហើយ"។

នៅទីបញ្ចប់ ភាគីទាំងពីរមិនដែលបានដកកងកម្លាំងរបស់ខ្លួនចេញឡើយ ។ រយៈពេល២ខែក្រោយមកការប៉ះទង្គិចគ្នាមួយប្រាវបានធ្វើឱ្យទាហានកម្ពុជា២នាក់បាត់បង់ជីវិតហើយមិនយូរប៉ុន្មាន រដ្ឋាភិបាលថ្មីមួយដែលមានទំនាក់ទំនងល្អជាមួយយោធា ក៏បានចូលកាន់អំណាចក្នុងក្រុងបាងកក។ កងទ័ពថៃ និងកងទ័ពកម្ពុជានៅតែបន្តឈរជើងនៅព្រំដែននេះ ចាប់តាំងពីពេលនោះមកហើយបានប៉ះទង្គិចគ្នាជាច្រើនលើកដោយបណ្តាលឱ្យមានមនុស្សស្លាប់កាន់តែច្រើន។

ទន្ទឹមនឹងនេះ កូនប្រុសច្បងរបស់លោកនាយករដ្ឋមន្ត្រីរូបនេះបានបន្តឡើងដំណែងជាបន្តបន្ទាប់ក្នុងជួរយោធាដោយជំរុញឱ្យមានការប៉ាន់ស្មានកាន់តែច្រើនឡើងអំពីការត្រៀមខ្លួនរបស់លោកសម្រាប់ការធ្វើជាមេដឹកនាំកំពូល។

លោក ហ៊ុន ម៉ាណែត ត្រូវបានដំឡើងឋានន្តរស័ក្តិជាឧត្តមសេនីយ៍ទោកាលពីខែមករា គឺតែរយៈពេលប៉ុន្មានខែប៉ុណ្ណោះ ក្រោយពីទទួលបានការតែងតាំងជានាយសេនាធិការរងចម្រុះនៃកងយោពលខេមរភូមិន្ទ។ លោកមានឋានន្តរស័ក្តិជាមេបញ្ជាការនៃកងកម្លាំងប្រយុទ្ធប្រឆាំងភេរវកម្មជាតិស្រាប់ទៅហើយនៅពេលនោះ។

លោកឧត្តមសេនីយ៍ទោ ហ៊ុន ម៉ាណែត បានបញ្ចប់ការសិក្សាពីបណ្ឌិតយោធាសហរដ្ឋអាមេរិកនៅ West Point ក្នុងឆ្នាំ១៩៩៩ ហើយជាជនកម្ពុជាដំបូងដែលបានបញ្ចប់ការសិក្សានៅទីនេះ។ បន្ទាប់មកលោកក៏បានបន្តការសិក្សាយកបរិញ្ញាបត្រជាន់ខ្ពស់នៅសាកលវិទ្យាល័យញូយ៉ក (New York University) ទៀត។

អំឡុងពិធីប្រគល់សញ្ញាបត្រមួយក្នុងក្រុងភ្នំពេញកាលពីម្សិលមិញលោក ហ៊ុន សែន បានធ្វើអត្ថាធិប្បាយអំពីអាហាររូបករណ៍មួយផ្សេងទៀតរបស់សហរដ្ឋអាមេរិកសម្រាប់លោក ហ៊ុន ម៉ានី ដែលជាកូនប្រុសរបស់លោកដែរ។ លោក ហ៊ុន ម៉ានី ទទួលបានប្រាក់អាហាររូបករណ៍ចំនួន១៧៥.០០០ដុល្លារ ពីសាកលវិទ្យាល័យការពារជាតិ (National Defense University) របស់សហរដ្ឋអាមេរិកក្នុងឆ្នាំសិក្សា២០០៩-២០១០របស់ខ្លួន។

លោកនាយករដ្ឋមន្ត្រីបានមានប្រសាសន៍ថា "ខ្ញុំមិនបានស្នើសុំបញ្ជូនពួកគេទៅទេ គឺសហរដ្ឋអាមេរិកទេដែលចង់ឱ្យពួកគេទៅសិក្សានៅទីនោះ"។ លោកបានបន្ថែមថា "ខ្ញុំចង់បញ្ជាក់រឿងនេះ ពីព្រោះជាទម្លាប់នោះខ្ញុំមិនស្នើសុំទេ។ ឱ្យឬមិនឱ្យគ្មានបញ្ហាឡើយ។ តែយ៉ាងណាក៏ដោយ ខ្ញុំសូមអរគុណពួកគេ ដែលបានអនុញ្ញាតឱ្យកូនប្រុសរបស់ខ្ញុំទៅសិក្សានៅទីនោះ"៕




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន (តពីលេខមុន)**

•**៣-៤ កញ្ញា** : ការជួបប្រជុំសម្ងាត់នៅតំបន់ឆេន ឌូ ( Chen Du) ស្រុកចិន រវាងចិន និងយួន នៅស្រុកស៊ីជួអ័រន (Sichuan) : គឺជាសម្រុះសម្រួលលើកទី១ - ផ្នែកទំនាក់ទំនងរវាងចិន និងយួន ។

•**៥-១០ កញ្ញា** : ការប្រជុំក្រៅផ្លូវការនៅក្រុងហ្សាកាតា (Djarkata) អំពីការប្រជុំក្រៅផ្លូវការណ៍ (JIM-II) (J Intertional Meeting II) ។ ការពិនិត្យដោយក្រុមសមាជិកអចិន្ត្រៃយ៍ (P5) លើឯកសារ "កិច្ចព្រមព្រៀងសរុប" ។ មានការទទួលយកបានលើគោលការណ៍ចំបងទូទៅ ដោយភាគីខ្មែរជម្លោះទាំង៤ក្រុម ។ នៅមានចំណុចមួយចំនួនដែលនៅខ្វះចម្លើយ ។ មានការបង្កើតឧត្តមក្រុមប្រឹក្សាសន្តិសុខ" (C.N.S) ។ រដ្ឋាភិបាលជាតិកម្ពុជា មានសមាជិកខ្លួន៦នាក់តំណាង និង៦នាក់ទៀតមកពីរដ្ឋកម្ពុជា ។ សមាជិកជាន់ខ្ពស់ខ្មែរក្រហមពីរនាក់ ត្រូវបានគេទទួលឱ្យអង្គុយពេញសិទ្ធិក្នុងអង្គប្រជុំបង្កើត CNS នោះ។ ភាគីកម្ពុជាក្នុងជម្លោះ ទទួលយកសេចក្តីអំពាវនាវស្តីពីការកម្រិតសកម្មភាពយោធាដោយស្ម័យប្រវត្តិ ។ ការចាប់ដៃរវាង ហ៊ុន សែន និង ខៀវ សំផន ។ ស្តេច សីហនុ ពុំមានវត្តមាន ហើយពុំត្រូវបានកំណត់លើបញ្ជីតំណាងរបស់ហ៊្វុនស៊ិចប៉ិចនៅក្នុងឧត្តមប្រឹក្សាសន្តិសុខ CNS ទេ ។

•**១៨-២០ កញ្ញា** : កាប្រជុំនៃក្រុមឱ្យឧត្តមប្រឹក្សាសន្តិសុខ CNS នៅក្នុងបរិវេណស្ថានរាជទូតខ្មែរនៅបាងកក ។ ការស្នើតែងតាំង ស្តេច សីហនុ ជាក្បាលម៉ាស៊ីន និងជាបុគ្គលទី១៣ ក្នុងអង្គការឧត្តមប្រឹក្សាសន្តិសុខ CNS បានត្រូវជំទាស់ដើរពុំរួច ។ ការកាត់ផ្តាច់ភាពទ្វេភាគីនៃ ឧ.ប.ស ត្រូវបានកើតឡើង ។

•**២៧ កញ្ញា** : ជាលើកទី១ កាកបាតក្រហមអន្តរជាតិ (CICR) ត្រូវបានអនុញ្ញាតឱ្យចូលទស្សនាពន្ធនាគារនៅប្រទេសកម្ពុជា ដោយយោងតាមគោលការណ៍ផ្ទាល់របស់អង្គការនេះ (CICR) ។ អង្គការនេះអាចបង្កើតសកម្មភាពមនុស្សធម៌ជាអចិន្ត្រៃយ៍ក្នុងខេត្តទាំងឡាយ ដែលមានចម្បាំងរាំងជល់ ដូចជាខេត្តបន្ទាយមានជ័យ និងបាត់ដំបង ។

•**១ តុលា** : ការបើកសម្ពោធមជ្ឈមណ្ឌលវប្បធម៌បារាំង នៅភ្នំពេញ ក្រោមអធិបតីភាពរបស់លោក ផៃរ៍ អនុរដ្ឋមន្ត្រីការបរទេសបារាំង ។ មនុស្សចំនួន ៨០០០នាក់ បានចុះឈ្មោះចូលរៀនភាសាបារាំងក្នុងរយៈពេលតែមួយសប្តាហ៍កន្លងទៅ ។

•**៧ តុលា** : ដូចការចោទប្រកាន់របស់អ្នកកាសែតពីលហ្គែរ និងក្រុមសភាអង់គ្លេសពីរនាក់ គ្រីស្សមូលីន និង អាន់ក្លីវីដ រដ្ឋាភិបាលអង់គ្លេសទទួលស្គាល់ប្រត្យក្សភាព ដែលថា កងកម្លាំងពិសេស SAS អង់គ្លេស បង្ហាត់បង្វឹកបង្វើនកងពលបេស់រដ្ឋាភិបាលចម្រុះត្រីភាគី ( G.C.K.D) តាំងពីឆ្នាំ១៩៨៥ នៅប្រទេសម៉ាឡេស៊ី និងតាមព្រំប្រទល់ថៃ ។

•**១២ តុលា** : កៅអីតំណាងកម្ពុជា នៅ អ.ស.ប ត្រូវបានទំនេរ ។ កំប៉ុន្តែរដ្ឋាភិបាលចម្រុះភាគីកម្ពុជាប្រជាធិបតេយ្យ (GCkKD) និងរដ្ឋាភិបាលរដ្ឋកម្ពុជា នៅទ្រឹងមិនដើរចោល ។ ដំណោះស្រាយមួយដែលបានទទួលអនុម័តជាឯកច្ឆ័ន្ទលើកិច្ចប្រឹងប្រែងកន្លងទៅ ។ វាពុំមានហេតុផលអ្វីទៀតលើការបន្ទុទណ្ឌកម្មសេដ្ឋកិច្ច ។

•**សប្តាហ៍ទី២ខែតុលា** : ភាគីខ្មែរក្រហមវាយប្រហារលើទូររថភ្លើងឆ្ពោះទៅកំពង់សោម ។ មានស្លាប់៥០នាក់ ។

•**២៣ តុលា** : ស.ហ.រ សម្រេចផ្តាច់ជំនួយដល់អង្គភាព សេ.អ៊ី.អា (CIA) ក្នុងយុទ្ធនាការទាំងឡាយក្នុងសម្ព័ន្ធ KWG ។

•**២៥ តុលា** : ការប៉ាន់ស្មានរកដំណោះស្រាយបែប "ក្រហម" ពោល ផ្អែកលើកិច្ចព្រមព្រៀងគ្នារវាងសាខាកុម្មុយនីស្តទ្រទ្រង់ដោយក្រុងប៉េកាំង និង ហាណូយ ត្រូវគេលើកយកមកពិនិត្យពិភាក្សា ។

•**២ វិច្ឆិកា** : តាមការព្រមព្រៀងគ្នា យុទ្ធនាការរួមរវាងភាគីខ្មែរក្រហម និងសីហនុនិយម បានវាយប្រហារលើមន្ទីរពេទ្យសំរោង ។

•**៥-១០ វិច្ឆិកា** : នៅហ្សាកាតា (Djarkata) មានការប្រជុំកំពូលរវាងមន្ត្រីជាន់ខ្ពស់ និងជំនាញនៃសមាជិកអចិន្ត្រៃយ៍ (P5) ជាមួយនឹងប្រទេសសមាជិកសហប្រជាជាតិ ៧នាក់ទៀត ។ ក្នុងបំណងលំអិតបញ្ចប់គម្រោងកិច្ចព្រមព្រៀងនៃដំណោះស្រាយនយោបាយទាំងស្រុង ។

•**៣០ វិច្ឆិកា** : មានមនុស្ស៤០០០នាក់ នាំគ្នាទស្សនាប្រាសាទបាយ័ន ( អង្គរវត្ត) ។

•**២១-២៣ វិច្ឆិកា** : ការប្រជុំនៅប៉ារីស រវាងសមាជិកឧត្តមប្រឹក្សាសន្តិសុខ CNS ជាមួយប្រធានចម្រុះទាំងពីរ និងលោក រ៉ាហ្វាតឌីន (RAFFEUDIN AHMEA) ។

**(នៅមានតលេខក្រោយទៀត)**






# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha

- ❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- ❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្សឺត .អេ.លី
- ❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- ❖ បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

**១៣១-** ពេលដែលព្រះពុទ្ធជាម្ចាស់គង់នៅក្នុងមិគទាយវ័ន មានបុរសម្នាក់ឈ្មោះ **យស** ជាកូនរបស់មហាសេដ្ឋីម្នាក់នៅស្រុកពារាណសី ថ្ងៃមួយមានការនឿយហត់ធុញទ្រាន់ចំពោះគ្រួសារ និងជីវិតរស់នៅដែលពោរពេញទៅដោយតម្រេកតណ្ហាជាមួយពួកស្រីជាច្រើន បានកើនឡើងកាន់តែខ្លាំងឡើងៗ ។ គាត់ក៏បានលួចរត់ចេញពីផ្ទះដោយស្ងៀមស្ងាត់មិនឱ្យអ្នកណាម្នាក់ដឹង ហើយក៏បានជួបនឹងព្រះពុទ្ធជាម្ចាស់នៅតាមផ្លូវ ។ ដោយបានស្តាប់ធម៌ ព្រះពុទ្ធបរមគ្រូសំដែង និងដោយបានយល់ជាក់ច្បាស់អំពីផលប្រយោជន៍នៃការប្រតិបត្តិធម៌ គាត់ប្រែជាមានចិត្តសប្បាយរីករាយរួចបានថ្វាយបង្គំទូលសុំសេចក្តីអនុញ្ញាតលះបង់ផ្ទះសម្បែង ដើម្បីបានប្រតិបត្តិធម៌ជាមួយព្រះពុទ្ធអម្ចាស់ ។ នៅថ្ងៃជាមួយគ្នានោះ បិតាយសដែលបានតាមរកកូនក៏បានជួបនឹងព្រះពុទ្ធ ហើយបានទូលសួរព្រះអង្គអំពីកូនរបស់គាត់ ។ ព្រះសម្មាសម្ពុទ្ធបរមគ្រូទ្រង់បានទេសនាទូន្មានគាត់នូវបញ្ហាធម៌ដ៏សមរម្យញ៉ាំងគាត់ឱ្យបានយល់ធម៌ ពេលនោះ គាត់កើតមានចិត្តសប្បាយរីករាយក្នុងធម៌រួចហើយក៏យល់ព្រមអនុញ្ញាតឱ្យកូនមកបួស ។

**១៣២**- ក្រោយពីបានស្តាប់ព្រះធម៌ព្រះអង្គ សេដ្ឋីមានបីតិបាមោជ្ជៈសប្បាយក្រៃលែង រួចគាត់ក៏បានព្រះពុទ្ធ ព្រះធម៌ជាទីពឹងទីរលឹកបានតាំងសេចក្តីប្រាថ្នាសុំឱ្យបានជាឧបាសកម្នាក់ក្នុងព្រះពុទ្ធសាសនា និងបានគោរពប្រតិបត្តិតាមព្រះពុទ្ធគ្រប់ៗជាតិ ។ បន្ទាប់មកគាត់បាននិមន្តព្រះសម្ពុទ្ធ និងព្រះយសភិក្ខុទៅផ្ទះរបស់គាត់ដើម្បីទទួលភត្តនៅវេលាព្រឹកស្អែក ។ ក្រោយមកទៀត កល្យាណមិត្ត៤នាក់របស់ព្រះយសក៏បានមកបួសជាភិក្ខុតាមព្រះយស ហើយភិក្ខុមទាំង៤អង្គបាននាំសំលាញ់៥០នាក់មកពីត្រកូលអភិជនមកបួសជាភិក្ខុក្នុងព្រះពុទ្ធសាសនាផងដែរ ។ ដោយពុំចាំបាច់មានការត្រួតត្រាពីព្រះពុទ្ធជាម្ចាស់ទាល់តែសោះ ភិក្ខុទាំងឡាយខិតខំព្យាយាមសិក្សារៀនសូត្រដោយព្រះទ័យទុកដាក់ និងប្រតិបត្តិដោយហ្មត់ចត់បំផុត ។ មិនយូរប៉ុន្មានពួកភិក្ខុទាំងអស់ក៏បានសម្រេចជាព្រះអរហន្តគ្រប់ៗអង្គ ។

**១៣៣**-នៅពេលដែលព្រះពុទ្ធទ្រង់បានភិក្ខុសាវ័ក ៦០អង្គ ព្រះអង្គទ្រង់ប្រារព្ធកិច្ចប្រជុំមួយដើម្បីឱ្យភិក្ខុទាំងអស់និមន្តទៅផ្សព្វផ្សាយព្រះធម៌ ។ ព្រះអង្គទ្រង់ត្រាស់ថា "ម្នាលភិក្ខុទាំងឡាយ! តថាគតបានរួចរំដោះផុតពីចំណងទាំងឡាយនៃមនុស្ស និងទេវតាហើយ អ្នកទាំងឡាយក៏ដូច្នោះដែរ ។ ឥឡូវនេះ ចូរអ្នកទាំងឡាយទៅផ្សព្វផ្សាយព្រះធម៌នៅតាមតំបន់ផ្សេងៗ ដើម្បីឱ្យប្រជាជនកាន់តែច្រើនឡើងៗទៀតមានឱកាសទទួលយកនូវប្រយោជន៍ និងសេចក្តីសុខដូចគ្នា ។ អ្នកមិនត្រូវត្រាច់ទៅមានផ្លូវពីរនាក់ក្នុងផ្លូវតែមួយទេ ។ ចូរខំផ្សាយព្រះធម៌ទៅគ្រប់ទិសទីទាំងអស់ ដើម្បីឱ្យមនុស្សទាំងឡាយអាចបានដុះខាត់សំអាតចិត្តនឹងទទួលនូវពន្លឺព្រះធម៌។ មានមនុស្សខ្លះក្នុងសន្និវាសនេះ ជាអ្នកមានកាមកិលេសស្រាលស្តើង និងតណ្ហាតិច ។ មនុស្សបែបនេះ កាលបើមិនបានស្តាប់ព្រះធម៌ទេ មានន័យថា គេនឹងត្រូវខាតបង់ប្រយោជន៍ដ៏ធំធេង ។ គេជាមនុស្សរង់ចាំតែព្រះធម៌ប៉ុណ្ណោះ ហើយគេនឹងបានយល់ព្រះធម៌យ៉ាងច្បាស់ ។ ទុកឱ្យតថាគតទៅសំដែងនៅឧរុវេលប្រទេស " ។

**តទៅលេខក្រោយ**

- Original Illuatration and Naration in Thai by Gunapayuta.
- Translation into English by A Lu.
- Coloring by Yann Fang Lee
- Translation into Khmer by Bhikkhu Kong Am.



*(Continued to After Issue)*

**131**- While the Buddha was in Mrgadava, a young man named Yasas, who was the son of a millionaire of Varanasi, suddenly one day grew tired of his family and of his lustful life with many women. He ran away from home secretly and happened to meet the Buddha on his way. Upon hearing the Buddha preach and on learning the benefits of Dharma practice, he became exultant and requested permission to leave home and practice with the Buddha. On the same day, Yasas´s father, in search of his son, met the Buddha ans asked him about his son. The Buddha instructed him on appropriate points of the dharma causing him to understand and joy arose in the and allowed his son to leave home and become a monk.

132- After hearing the Buddha preach, the rich man was very happy and he also took refuge in the Buddha -dharma, and he expressed his wish to be a Buddhist lay follower and follow life after life the Buddha-dharma. He then invited the Buddha and Yasas to his home on the next morning for an offering. Later, four Yasas´ best friends also left home and became Buddhist bhikkhus and they, in thun, led fifty young men of noble families to become Buddhist bhikkhus. Without the need of the Buddha´s supervision, they all learned diligently and practiced strictly and before long, they all attained the stage of arhant.



133- When the Buddha had sixty bhiksus among his disciples, he held a meeting directing the bhiksus to propagate the dharma. The Buddha said: Bhik-khus! I have been released from all the bondages of mankind and devas, and you have been released also. Now you are going to propagate to Dharma to other places to give more people the chance of having the same benefit and happiness. No two of you should go the same way. Be sure to spread the dharma to all places far and near sothat human life may be burified and brightened. There are people in the world who have light passion and little desire. To such people, missing the apportunity to hear dharma means great lost of benefit. there are people ready for dharma, and they will be able ti understand it clearly. I myself will go out to preach at Uruvilva."

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា សឺន សាន




ដោយ : ម៉ម យឺន

•••ដោយសារតែសេចក្តីអង់អាចក្លាហាន និងទឹកភក្តីស្មោះត្រង់ចំពោះជាតិ លោកសេនាប្រមុខបានយល់ព្រមទទួលបេសកកម្មពិសេសនេះ ដើម្បីជួយស្រោចស្រង់ប្រទេស និងប្រជាជាតិ ។

ក្រោយពីបានបញ្ជាឱ្យលោក លន់ នល់ រៀបចំរដ្ឋាភិបាលពិសេសរួចហើយ ប្រមុខរដ្ឋខ្មែរត្រូវយាងទៅប្រទេសបារាំង ដើម្បីព្យាបាលព្រះរោគ ដោយមានលោកសេនាប្រមុខជូនដំណើរព្រះអង្គទៅដល់ប្រទេសបារាំងដែរ រួចហើយក៏ត្រឡប់មកដឹកនាំរដ្ឋាភិបាលវិញតាមប្រក្រតី ។

គួរឱ្យវិតកខ្លាំងណាស់ចំពោះស្ថានការណ៍វិបត្តិនយោបាយនៅក្នុងប្រទេសខ្មែរនេះ ដែលកើតចេញមកពីកងទ័ពព្រៃយួនយៀកកុង បណ្តាលឱ្យមានទុក្ខវេទនាដល់ប្រជាពលរដ្ឋខ្មែររស់នៅតាមបណ្តាខេត្តជាប់ព្រំប្រទល់ខ្មែរ-យួន ចេះតែមានកើនឡើង រហូតធ្វើឱ្យបណ្តាជនទាំងនោះទ្រាំទ្រមិនបានក៏ផ្ទុះចេញជាការប្រជុំបាតុកម្មទាមទារឱ្យកងទ័ពព្រៃយួន ត្រូវតែដកចេញពីទឹកដីខ្មែរ ។

មុនដំបូងផ្តើមកើតឡើងនៅខេត្តស្វាយរៀង បន្ទាប់មកក៏បានរីករាលដាលទៅដល់ទីក្រុងដទៃទៀត ជាពិសេសនៅក្នុងរាជធានីភ្នំពេញ ។ មហាបាតុកម្មនៃមហាជនបានផ្ទុះឡើងសំដៅទៅរកស្ថានទូតប្រទេសយួនកុម្មុយនីស្ត ដើម្បីទាមទារតវ៉ាឱ្យកងទ័ពព្រៃយួនយៀកកុង ត្រូវតែដកទីតាំងទ័ពឱ្យចេញអស់ពីទឹកដីខ្មែរ ព្រមទាំងសម្ភ័ន្ធចលនូបត្ថម្ភទាំងអស់ដែលមានពាសពេញប្រទេសខ្មែរឱ្យបញ្ឈប់សកម្មភាពធ្វើឱ្យខូចខាតដល់របបសេដ្ឋកិច្ចខ្មែរយ៉ាងធ្ងន់ធ្ងរបំផុត ។ មហាបាតុកម្មដ៏មានកំហឹងយ៉ាងខ្លាំងក្លានេះ ពុំបានបញ្ចប់ទៅដោយងាយបានទេ ដោយសារកងទ័ពព្រៃយួនយៀកកុងពុំព្រមធ្វើតាមការទាមទារតវ៉ារបស់មហាបាតុកម្មខ្មែរ ធ្វើឱ្យលោកនាយករដ្ឋមន្ត្រីមានកង្វល់យ៉ាងខ្លាំង ដើម្បីរិះរកវិធីដោះស្រាយបញ្ហាដ៏មហាធំនេះឱ្យបានស្ងប់ស្ងាត់ទៅវិញ ដោយសន្តិវិធី ទើបលោកនាយករដ្ឋមន្ត្រី រួមទាំងគណរដ្ឋមន្ត្រីសម្រេចស្នើសុំឱ្យរដ្ឋសភាជាតិ ត្រូវតែបើកសម័យប្រជុំវិសាមញ្ញពិភាក្សារកទ្វារដំណោះស្រាយបញ្ហាមហាបាតុកម្មនេះ ។

ក្រោយពីរដ្ឋសភាជាតិ បានប្រជុំពិភាក្សាយ៉ាងល្អិតល្អន់អំពីរបៀបវារៈជុំវិញបញ្ហាមហាបាតុកម្មមហាជននេះមក បានរកឃើញមូលហេតុសំខាន់មួយដែលជាហេតុប៉ះពាល់ដល់អាយុជីវិតនៃប្រទេសជាតិ និងឯករាជ្យភាពបូរណភាព អធិបតេយ្យភាពទឹកដី សេដ្ឋកិច្ច និងសន្តិភាពនៃជនជាតិខ្មែរ ទើបរដ្ឋសភាជាតិបានអនុម័តជាឯកច្ឆន្ទ គឺមានសម្លេង៩៩ទល់នឹង ៩៩ ថាត្រូវតែដកអំណាចពីប្រមុខរដ្ឋខ្មែរ ចាប់តាំងពីថ្ងៃទី១៨ ខែមីនា ឆ្នាំ១៩៧០នេះតទៅ ដើម្បីជួយស្រោចស្រង់ប្រទេសជាតិ ។

សូមបញ្ជាក់ថា កិច្ចប្រជុំវិសាមញ្ញនៃរដ្ឋសភានេះ បានប្រព្រឹត្តទៅក្រោមអធិបតីភាពលោក អ៊ិនតាំ ជាប្រធានរដ្ឋសភា ។

### ប្រតិកម្មប្រមុខរដ្ឋ និងស្ថានភាពក្រោយដកអំណាច?

ក្រោយពីការដកអំណាចរបស់ប្រមុខរដ្ឋខ្មែរនេះ ពុំអាចធ្វើឱ្យនាយករដ្ឋមន្ត្រី លន់ នល់ ដោះស្រាយបញ្ហាខ្មែរនេះបានទេ មិនតែប៉ុណ្ណោះ វាធ្វើឱ្យស្ថានការណ៍កាន់តែដុនដាបខ្លាំងឡើង ដោយសារប្រមុខរដ្ឋខ្មែរ ដែលកំពុងព្យាបាលរោគ មានសេចក្តីក្រេវក្រោធយ៉ាងខ្លាំង ហើយធ្វើសេចក្តីប្រកាសប្រាប់ពួកសារព័ត៌មានអន្តរជាតិថា ព្រះអង្គពុំអាចចុះចេញពីអំណាចបានទេ ព្រះអង្គនៅតែជាប្រមុខរដ្ឋពេញច្បាប់ដដែល ។

ទោះបីជាមានការបញ្ជូនវីរជនសំខាន់ៗឱ្យទៅក្រាបទូលពន្យល់ព្រះអង្គយ៉ាងណាក៏ដោយ ក៏ព្រះអង្គមិនទទួលយល់ព្រមជាដាច់ខាត រហូតដល់ដំណាក់កាលចុងក្រោយចាត់ឱ្យទ្រង់ កន្តុល ដែលជាព្រះញាតិវង្ស ទៅទូលអង្វរយ៉ាងណាក៏ព្រះអង្គពុំព្រមតាមដែរ ។

បន្ទាប់មកព្រះអង្គយាងចេញពីប្រទេសបារាំង ទៅកាន់សហភាពសូវៀត ដើម្បីសុំសេចក្តីគាំទ្រ ប៉ុន្តែសហភាពសូវៀតពុំព្រមទទួល ទើបព្រះអង្គសម្រេចហឫទ័យទៅកាន់ប្រទេសចិនប្រជាមានិត ដែលមានលោក ម៉ៅសេទុង លោក ជូអេនឡាយ លោក ចេនយី ជាមេដឹកនាំ ។

នៅពេលទៅដល់ប្រទេសចិនប្រជាមានិត អតីតប្រមុខរដ្ឋខ្មែរបានសុំសិទ្ធិជ្រកកោន និងសុំសេចក្តីគាំទ្រពីប្រទេសចិន ដើម្បីជួយព្រះអង្គក្នុងការប្រយុទ្ធប្រឆាំងនឹងរដ្ឋាភិបាលខ្មែរ ដឹកនាំដោយលោកសេនាប្រមុខ លន់ នល់ និងទ្រង់ ស៊ីសុវត្ថិ សិរិមតៈ ដែលអតីតប្រមុខរដ្ឋខ្មែរចាត់ទុកថា ជាជនក្បត់ជាតិ ធ្វើរដ្ឋប្រហារដណ្តើមអំណាចពីព្រះអង្គដោយខុសច្បាប់ ដូច្នេះព្រះអង្គគឺនៅតែស្ថិតនៅជាប្រមុខរដ្ឋខ្មែរពេញច្បាប់ដដែល ។ ពេលនោះប្រទេសចិនប្រជាមានិតបានទទួលស្គាល់ថា អតីតប្រមុខរដ្ឋខ្មែរនេះ នៅតែជាប្រមុខរដ្ឋពេញច្បាប់ ។



ដោយសារតែការជួយគាំទ្រពីសំណាក់ប្រទេសចិនប្រជាមានិតនេះហើយ ធ្វើឱ្យអតីតប្រមុខរដ្ឋខ្មែរបញ្ចេញសកម្មភាពយ៉ាងខ្លាំងក្លា ប្រកាសផ្សាយនូវសេចក្តីថ្លែងការណ៍ និងបទបញ្ជាសំខាន់ៗ ទៅដល់ប្រជាពលរដ្ឋខ្មែរទូទៅទាំងប្រទេស តាមរយៈស្ថានីយ៍វិទ្យុផ្សាយសម្លេងក្រុងប៉េកាំង ជាភាសាខ្មែរ ដែលមានកម្លាំងផ្សាយយ៉ាងខ្លាំង តម្រង់ទិសមកប្រទេសខ្មែរ ។ (នៅមានតលេខក្រោយទៀត)

# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING



**(តមកពីលេខមុន)**

**រៀបរៀងដោយ**

**លោក ម៉ៅ ច័ន្ទសំណុំ**

•ជាក់ស្តែង បើគិតនឹកភ្នកដល់មនុស្សអាក្រក់នានាពីអតីតកាល អ្នកនឹងពិសោធឃើញភ្លើងក្តៅក្រហាយឆួលពាសពេញរាងកាយ ការស្អប់ខ្ពើម គំនុំគំគួន ចងអាឃាតស្បថស្បែពុំចង់ជួបគ្រប់ជាតិ មួយរំពេចហាក់ដូចរឿងទាំងនោះ កើតឡើងថ្មីៗសោះ ទោះបីជននោះៗស្លាប់បាត់ទៅហើយក្តីឬនៅឆ្ងាយកំបាំងមុខអ្នកក្តី ។ ថាមពលដ៏តជាមខ្មៅកខ្វក់នៅវត្តមានក្នុងសរីរាង្គកាយអ្នកជានិច្ច រហូតដល់ពេលអ្នកស្លាប់ឬប្រហែលបន្តទៅជាតិខាងមុខទៀត វាបន្តបឺតជញ្ជក់ឈាមដូចព្រូន តេនញ៉ា ឬខ្មោចឆៅដូច្នោះឯង ។ ឃើញទេ ! តើអ្នករែកពុនថាមពលដ៏ខ្មៅ និងគ្រោះថ្នាក់បែបនេះ ប៉ុន្មានតោនក្នុងខ្លួន ចិត្ត អារម្មណ៍ ? តើអ្នកបន្តត្រាំរុំរ៉ៃនឹងទុក្ខសោកនឹងស្រមោលអតីតកាលប៉ុន្មានឆ្នាំទៅទៀត ? នេះហើយដែលព្រះពុទ្ធត្រាស់សំដែងថាជា មោហៈ ក្នុងសារជាតិជាមនុស្ស (Ignorance) ។ សូមសួរថា តើអ្នកអាចរំលាយគំនរថាមពលខ្មៅនេះ ហើយដណ្តើមយកសេរីភាពបានមកវិញឬទេ ? ចម្លើយថាពិតជាអាចសំរេចបានប្រាកដមែន តាមវិធីសន្តោស ត្រាប្រណី ការអត់ឱនទោស និងការផ្សាយមេត្តានេះឯង ។ វិធីនេះមើលពីក្រៅហាក់ដូចតូចតាច គ្មានន័យ ឬឥតប្រយោជន៍។ ប៉ុន្តែជាក់ស្តែងវាមានអត្ថន័យដ៏ធំធេង ព្រោះវាមាននាទីជីកគាស់រំលើងកំទេចគំនរថាមពលអាក្រក់ ឬកម្មចាស់ឱ្យរលាយសាបសូន្យពីខ្លួនមនុស្ស និងអនុញ្ញាតឱ្យយើងជាមនុស្សនេះរៀបចំខ្សែជីវិតថ្មី ប្រកបដោយពន្លឺសុភមង្គលទៅមុខទៀត ។

**សូមជូនឧទាហរណ៍ជាក់ស្តែងមួយ :** ខ្ញុំធ្លាប់មានរឿងអាស្រូវនឹងឈ្មោះ «ក» ជាយូរលង់មកហើយ កំហឹងត្រាំនៅក្តៅងំក្នុងខ្លួនខ្ញុំ ។ ខ្ញុំអនុវត្តមេត្តាភាវនានេះ ដោយសំដែងការអភ័យទោស អនុគ្រោះទោសដល់ខ្លួនខ្ញុំផង និងដល់លោក «ក» ផង ហើយនិងសូមឱ្យលោក «ក» អភ័យទោសមកខ្ញុំវិញផង ។ លុះប្រតិបត្តិដូច្នេះញឹកញាប់ទៅថាមពលខ្មៅនេះ កំហឹងងំនេះ នឹងរជក រលំរលាយ សាបសូន្យ ពីខន្ធសន្តានខ្ញុំយ៉ាងពិតប្រាកដ ។ ខ្ញុំពិសោធឃើញហេតុការណ៍មួយដ៏ចម្លែកអស្ចារ្យ (ដែលខ្ញុំពុំបាននឹកភ្នកដល់) ។ ជួនពេលមួយនោះ លោក «ក» ដើរមកចំពោះមុខខ្ញុំៗហាក់ភ្លេចថា ជននេះធ្លាប់មានរឿងនឹងខ្ញុំទៀតផង។ ការបរិយាយបែបនេះ ពុំមែនជារឿងប្រឌិតទេ ខ្ញុំធ្លាប់ពិសោធន៍ពិតៗជាក់ស្តែង ។ សូមអ្នកពិសោធន៍ប្រតិបត្តិខ្លួនឯងចុះ នឹងឃើញដូចខ្ញុំពុំខានឡើយ ព្រោះនេះជាក្រឹត្យក្រមធម្មជាតិ ដែលមនុស្សជាតិបានរកឃើញជាយូរលង់មកហើយ ប៉ុន្តែយើងពុំដែលដឹង និងយកវាមកប្រើប៉ុណ្ណោះ ។

**-ឥទ្ធិពលនៃការសំដែងការដឹងគុណ អំណរគុណ (កតញ្ញូតាធម៌) :**

កាលពីតូច ខ្ញុំធ្លាប់ឃើញជីតាខ្ញុំសំពះបាយមុនពេលហូបម្តងៗ ។ អាកប្បកិរិយាដ៏តូចនេះ មានន័យខ្លឹមសារដ៏ទូលំទូលាយណាស់ ។ ពេលគាត់ថ្វាយបង្គំបាយ មានន័យថា គាត់ដឹងគុណចំពោះអ្នកស្រែដែលពុះពារឧបសគ្គរាប់រយជំពូកដើម្បីដាំស្រូវ ។ គាត់ដឹងគុណចំពោះអ្នកកិនស្រូវ អ្នកលក់អង្ករ ។ ហួសពីនេះទៅទៀត គាត់ដឹងគុណព្រះធរណី (ដី) ព្រះអាទិត្យ និងធម្មជាតិជុំវិញដែលបង្កឱ្យស្រូវដុះលូតលាស់បានល្អ ។ល ។និង ។ល ។ ដូច្នេះផ្ទៃចិត្តទាំងមូលរបស់លោកតា ពុំឋិតនៅតែក្នុងបុគ្គល (Ego of mind/ Separation) ប៉ុណ្ណោះទេ គាត់បានបន្តភ្ជាប់ខ្លួនទៅនឹងពិភពធម្មជាតិជុំវិញ (Interconnection with the whole universe) ។ ន័យស៊ីជំរៅជាងនេះទៅទៀត បើពិនិត្យទៅលើគុណភាពកុងស្សនិសរបស់គាត់ៗ បានមុជជ្រៅទៅដល់កុងស្សនិសបរិសុទ្ធដែលជាទីកន្លែងប្រកបដោយចិត្តទូលាយ ធូរស្រាល អស់កង្វល់ សុខសប្បាយ រីករាយ ស្ងប់ ការសំរួល (Relax) សន្តិភាព ប្រាជ្ញា ជានារោគា Healing មេត្តា ករុណា ថាមពលវិជ្ជមានលេចឡើង ។ សូមអានបន្ថែមវគ្គកុងស្សនិសបរិសុទ្ធ ចំណុច «រូមនិងដោយឡែក hole/separation » ។

ចូរអ្នកពិសោធន៍ជាមួយខ្ញុំមួយភ្លែត សូមដាក់សៀវភៅចុះ ហើយបិទភ្នែក ដាក់អារម្មណ៍ រុករកការដឹងគុណទាំងឡាយដែលពាក់ព័ន្ធនឹងអ្នកផ្ទាល់ ដូចជាការដឹងគុណចំពោះលោកពុក អ្នកម៉ែដែលបានបីបាច់ថែរក្សាយើងចំពោះមិត្តភ័ក្រ្តដែលជួយទំនុកបំរុងយកអាសារចំពោះគ្រូខិតខំបង្រៀនយើង ចំពោះទឹកដីខ្មែរ ប្រជាជនខ្មែរ សម្បត្តិវប្បធម៌ខ្មែរ ដែលបានចិញ្ចឹមនិងអប់រំយើង ចំពោះអារ្យធម៌សាកលលោកបំប៉នចំណេះដឹងសព្វយ៉ាងចំពោះធម្មជាតិជុំវិញដែលផ្តល់ចំណីអាហារ ជំរក ថ្នាំ សម្រស់គួរគយគន់ ។ល ។ និង ។ល ។ បើធ្វើដូច្នេះបន្តទៅទៀត ហើយពិនិត្យមើលក្នុងខ្លួន តើមានអារម្មណ៍ដូចម្តេច ? ចំពោះខ្ញុំៗទទួលអារម្មណ៍សុខស្រួលក្នុងខ្លួន ស្ងប់ សប្បាយរីករាយ ភ្លឺថ្លា ដោយសារឥទ្ធិពលថាមពលវិជ្ជមាននានា ត្រូវបានរួចរំដោះអណ្តែតឡើង ហើយបញ្ចេញសារជាតិរបស់ខ្លួនឱ្យយើងដឹង ។

-ដូចខ្ញុំបានរៀបរាប់លំអិតអំពីកុងស្សនិសបរិសុទ្ធ និងស្នេហាពីមុនមកស្រាប់ក្នុងខ្លួនមនុស្សយើងម្នាក់ៗ មានថាមពលពិសេសមួយ គឺថាមពលនៃសេចក្តីស្នេហាដ៏បរិសុទ្ធ ។ វាបានកប់យ៉ាងជ្រៅកម្របញ្ចេញរូបរាងមកផ្ទៃលើនៃចិត្តមនុស្សណាស់ ។ ពេលណាវាងើបឡើងមកលើម្តងៗវាមាននាទីនឹងស៊ីកំទេចរាល់ថាមពលអវិជ្ជមានផ្សេងៗ (ដូចជាទុក្ខក្រៀមក្រំព្រួយបារម្ភ ភ័យខ្លាច តណ្ហា ។ល ។) ។ម្យ៉ាងទៀតថាមពលនេះ បើអ្នកកាន់តែបញ្ចេញទៅក្រៅ ឬកាន់តែបញ្ជូនឱ្យទៅក្រៅវាកាន់តែកើនក្នុងខ្លួនអ្នក ។

សមាធិមេត្តាភាវនានេះ មានភារៈបំផុសឱ្យថាមពលស្នេហាបរិសុទ្ធ ឬមេត្តាឥតព្រំដែនអណ្តែតឡើងមកផ្ទៃលើនៃចិត្តមនុស្ស នេះជាវិធីរំដោះចិត្តមនុស្សប្រកបដោយប្រសិទ្ធិភាពអស្ចារ្យណាស់ ។

**(នៅមានតលេខក្រោយទៀត)**



# ជោគជតារាសីទាំង១២ប្រចាំឆ្នាំថោះ






លោកអ្នកអាចនឹងមានមនុស្ស ភេទផ្ទុយ អាយុស្របាលគ្នា ចាំថ្កោលទោសទាញយកផលប្រយោជន៍ ឬពុំនោះសោតទេ ក៏ត្រូវចៅហ្វាយនាយស្ដីបន្ទោសពីរឿងការងារ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ មុននឹងទូទាត់បញ្ជីលុយកាក់ គួរតែពិនិត្យផ្ទៀងផ្ទាត់ឲ្យបានម៉ត់ចត់ចៀសវាងការថ្លោះធ្លោយ ។ រីឯបញ្ហា ស្នេហា មានការរកាំរកូសគ្នាតែមិនធ្ងន់ធ្ងរ ។




រាល់ការបំពេញភារកិច្ចប្រចាំថ្ងៃ ទោះបីជាមានការធុញថប់ ក្ដី ព្រោះមានអ្នកជួយជ្រោមជ្រែងគ្រប់ពេលវេលា ដូច្នេះលោកអ្នកមិនត្រូវអស់សង្ឃឹមឡើយ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ រកផលកម្រៃកាក់កបគ្រាន់បើ ថែមទាំងអាចសន្សំទុកដាក់បានខ្លះទៀតផង ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើលមើលបំណាំគ្នា ។




រាល់ការងាររបស់លោកអ្នកមានសភាពធ្លាក់ចុះមិនច្បាស់លាស់ ហេតុនេះទាមទារឲ្យលោកអ្នកមានការប្រយ័ត្នប្រយែង និងពុះពារឲ្យបានខ្លាំងជាបន្តទៀត ទើបអាចសម្រេចបានជោគជ័យ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហា ស្នេហាគូស្នេហ៍រមែងចេះអត់ឱនឲ្យគ្នា ។




គ្រប់ការងារទាំងអស់ដែលលោកអ្នកត្រូវធ្វើ បើមិនរកអ្នករួមសហការទេ គឺមិនអាចទទួលបានលទ្ធផលល្អឡើយ ហើយបើធ្វើដំណើរតាមយានយន្តលោកអ្នកគួរតែប្រុងប្រយ័ត្នខ្ពស់ផងដែរ ចៀសវាងការកើតមានគ្រោះថ្នាក់ដោយប្រការណាមួយ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញគួរជួញដូរនៅទីជិតៗទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្ដាប់ឱវាទគ្នា ។




រាល់ផលប្រយោជន៍ដែលខាតបង់ពីថ្ងៃមុននោះ មកដល់ពេលនេះអាចនឹងស្ដារបានឡើងវិញ ខ្វះដាក់ជាពុំខានហើយសេចក្ដីសុខចំរើនក៏កើតមានដល់លោកអ្នកផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចំរើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ។




រាល់ការបំពេញការងារផ្សេងៗរបស់លោកអ្នកនៅក្នុងពេលនេះមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះសូមប្រយ័ត្នកុំយកអាសាមនុស្សខ្ចាត់ព្រាត់ឲ្យសោះ ព្រោះនាំឲ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ផលកម្រៃបានមកកាក់កប និងអាចសន្សំទុកបាន ។រីឯបញ្ហាស្នេហា គឺគូ ស្នេហ៍មានស្ថានភាពដូចធម្មតាទេ ។




លោកអ្នកអាចនឹងមានការព្រួយបារម្ភច្រើន ព្រោះតែមានមនុស្សចេះតែតាមឈ្នានីស ឬពុំនោះសោតទេ ក៏អាចមានរឿងរ៉ាវដែលកើតឡើងដោយសារមនុស្សភេទផ្ទុយដែរ ដូច្នេះលោកអ្នកត្រូវមានការប្រុងប្រយ័ត្នឲ្យបានខ្ពស់ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាច នឹងមានការខាតបង់យ៉ាងធំ ដូច្នេះមិនគួរដាក់ទុនថ្មីឡើយ ។ រីឯបញ្ហាគូស្នេហ៍ច្រើនតែគោះគើយដាក់គ្នា ។




លោកអ្នកអាចនឹងត្រូវមនុស្សសម្បុរសមកបញ្ចុះបញ្ចូលចិត្តឲ្យដើរទៅរកផ្លូវមិនល្អហេតុនេះ បើសិនជាមានមែននោះ ចូរកុំរវីរវល់ជាមួយឲ្យសោះ ព្រោះអាចបណ្ដាលឲ្យមានក្ដីវិនាសអន្តរាយដល់ខ្លួនបាន ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្ដី គួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឲ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ។




គ្រប់កិច្ចការទាំងអស់ដែលលោកអ្នកស្រវាស្រទេញបំពេញបានផលយ៉ាងគាប់ប្រសើរ ព្រោះមានអ្នកចាំជួយជ្រោមជ្រែងគ្រប់ពេលវេលា ។ បើជាអាជីវកររកស៊ីវិញ អាចរកប្រាក់ចំណេញបានយ៉ាងច្រើន ហើយងាយស្រួលទៀតផង ជាមួយនេះក៏អាចពង្រីកមុខរបរបានថែមទៀត ។ រីឯបញ្ហាស្នេហាគ្មានអ្វីគួរឲ្យកត់សំគាល់ឡើយ ។




លោកអ្នកមានការឈ្លាសវៃក្នុងការបំពេញការងារផ្សេងៗ ដែលធ្វើឲ្យលោកអ្នកទទួលបានផលសម្រេចតាមគោលដៅដែលអ្នកប្រាថ្នាចង់បានយូរមកហើយ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចមានគេមកបបួលដាក់ទុនរកស៊ីជាមួយដែលលោកអ្នក គួរប្រថុយចុះ ព្រោះមិនខកបំណងទេ ។ រីឯបញ្ហាគូស្នេហ៍រស់នៅជាមួយគ្នាប្រកបទៅដោយភាពផ្អែមល្ហែម ។




លោកអ្នកអាចនឹងត្រូវចៅហ្វាយនាយ ឬមេការប្រកាន់ថ្នាក់ និងស្ដីបន្ទោសមិនបណ្ដាក់មាត់ឡើយ បើពុំនោះសោតទេ ក៏អាចមានការទាស់ទែងខ្វែងគំនិតគ្នាជាមួយញាតិពន្ធដែលជាអ្នកជិតស្និទ្ធផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចត្រូវខាតដើមដោយចៀសពុំរួចនោះទេ ដូច្នេះលោកអ្នកមិនគួរបោះទុនធំឡើយ ។ រីឯបញ្ហាស្នេហាច្រើនកើតរឿងឈ្លោះប្រកែកគ្នាដោយសារអ្នកដទៃ ។




លោកអ្នកច្រើនជួបនឹងការបរាជ័យទាំងក្នុងការបំពេញការងារទាំងការចេញទៅទាក់ទងនៅក្រៅ ហើយបើមានការធ្វើដំណើរទៅទីឆ្ងាយនោះ ក៏ត្រូវមានការប្រុងប្រយ័ត្នផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ លោកអ្នកមិនគួរប្រថុយប្រថានដាក់ទុនធំពេកនោះទេ ព្រោះអាចនាំឲ្យមានការខាតបង់ ។រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនពាក់មុខយក្សដាក់គ្នាខុសទំនង ។




## របៀបបំបាត់ស្នាមជ្រីវជ្រួញ

ស្នាមជ្រួញជារឿងធម្មជាតិ ប៉ុន្តែស្ត្រីភាគច្រើនមិនចង់ឲ្យស្នាមជ្រីវជ្រួញទាំងនោះមកបំផ្លាញសម្រស់របស់ស្បែកពួកគេនោះទេ ។ ដូចនេះហើយ ទើបអ្នកខ្លះព្យាយាមរកវិធីបំបាត់ស្នាមជ្រីវជ្រួញឲ្យអស់ ឬរកវិធីពន្យារភាពចាស់ជរារបស់ស្បែក ដែលសព្វថ្ងៃនេះមានការប្រើវិធីសាស្ត្រមួយចំនួន ដែលបានផលល្អ និងមានសុវត្ថិភាពនោះ គឺការបូមខ្លាញ់ក្នុងរាងកាយរបស់ខ្លួនឯង ទៅចាក់បញ្ចូលត្រង់ចំណុចដែលស្បែកមានភាពជ្រីវជ្រួញ ដែលវិធីនេះអាចនាំមកនូវការឈឺចាប់ខ្លះផងដែរ ។ ប៉ុន្តែ ប្រសិនបើអ្នកចង់បំបាត់ស្នាមជ្រីវជ្រួញលើស្បែកមុខតាមវិធីបែបធម្មជាតិនោះ យើងសូមណែនាំពីវិធីបែបងាយស្រួលមួយដែលមានការនិយមយ៉ាងខ្លាំងនៅអឺរ៉ុប និងសហរដ្ឋអាមេរិក ព្រោះអាចសន្សំសំចៃថវិកា និងបានផលល្អផងដែរ ។

វិធីនេះ គឺជាបឋមអ្នកត្រូវត្រៀមវត្ថុ២យ៉ាង គឺផ្លែប៉ោមខៀវ១ផ្លែ និងទឹកក្រូចឆ្មារ១ស្លាបព្រាកាហ្វេរួចយកផ្លែប៉ោមមកលាងទឹកឲ្យស្អាតមិនបាច់ចិតសម្បកចេញទេ គ្រាន់តែចិតជាចំណិតតូចៗរួចដាក់កិនក្នុងប្រដាប់ក្រឡុកផ្លែឈើឲ្យម៉ដ្ឋ ។ នៅពេលផ្លែប៉ោមត្រូវបានកិនម៉ដ្ឋហើយ ទើបច្របាច់ក្រូចឆ្មារដាក់១ស្លាបព្រាកាហ្វេកូរឲ្យសព្វចូលគ្នា រួចយកមកលាបបំពោកលើផ្ទៃមុខ លើកលែងតែបរិវេណជុំវិញភ្នែក និងបបូរមាត់ ។ ទុកចោល១០នាទីទើបលាងទឹកជម្រះចេញ ។

ធ្វើបែបនេះរៀងរាល់សប្ដាហ៍ មុខរបស់អ្នកនឹងរលោងតឹងស្រស់ថ្លា បំបាត់ស្នាមជ្រួញ និងភាពខ្មៅស្រគាំលើស្បែកបានយ៉ាងស័ក្ដិសិទ្ធិបំផុត ។



# វិធីថែបំប៉នសរសៃសក់ឱ្យរស់រវើក

នៅក្នុងផ្លែត្រសក់ គឺសម្បូរទៅដោយសារជាតិម៉យ ជីវ៉ាស៊ីវ បែបធម្មជាតិ ចំណែកទឹកដោះគោជូរវិញជួយឲ្យសរសៃសក់មានទម្ងន់រីឯទឹកឃ្មុំជួយឲ្យសរសៃសក់ឡើងខ្មៅរលើបរលោង ។

នៅក្នុងថ្ងៃឈប់សម្រាក បើអ្នកមិនចង់ចេញទៅក្រៅផ្ទះ ព្រោះចង់សន្សំប្រាក់នោះ យើងណែនាំ ដើម្បីថែបំប៉នឲ្យសក់ស្រស់ស្អាតដោយដៃខ្លួនឯង ដូចខាងក្រោមនេះ :

**គ្រឿងផ្សំ :**

-ផ្លែត្រសក់ហាន់ជាចំណិត១ផ្លែ

-ទឹកដោះជូរសជាតិធម្មជាតិ១កែវ

-ទឹកឃ្មុំ៣ស្លាបព្រាបាយ

**វិធីធ្វើ :**

១-ដាក់គ្រឿងផ្សំទាំងអស់ទៅក្នុងឧបករណ៍ក្រឡុករហូតដល់រលាយចូលសាច់តែមួយ ។

២-ប្រើល្បាយដែលក្រឡុកបាននេះ យកទៅលាបឲ្យសព្វតាំងពីគល់សក់រហូតដល់ចុងសក់ ។

៣-យកកន្សែងពោះគោជ្រលក់ទឹកក្ដៅបន្តិចរួចពូតឲ្យនៅស្រពាប់ បន្ទាប់មកយកមកឃ្លុំលើក្បាលទុកចោលប្រមាណជា២០នាទី ។

៤-លាងទឹកចេញឲ្យស្អាត កក់សក់ធម្មតា ។

រូបមន្តដើម្បីឲ្យសក់ស្អាតនេះ ប្រសិនបើបានធ្វើក្នុងមួយសប្ដាហ៍ម្ដង អ្នកនឹងមានអារម្មណ៍ប្លែកប្រែប្រួល ពិសេសអ្នកដែលមានបញ្ហាសរសៃសក់ ស្ងួត ហើយប្រយោជន៍ដែលទទួលបាន គឺធ្វើឲ្យសរសៃសក់មានភាពរស់រវើកដូចធម្មជាតិគួរឲ្យចង់អង្អែល ហើយស្បែកក្បាលត្រជាក់ស្រួលទៀតផង ។

នៅមានចំណុចពិសេសមួយទៀត គឺក្លិនដ៏ក្រអូបស្រទន់ពីផ្លែត្រសក់ជាប់នៅនឹងសរសៃសក់បានយូរថ្ងៃទៀតផង ។

តមកពីទំព័រទី ១

## សហគមន៍ព្រះសង្ឃខ្មែរនៅ...

ព្រះសង្ឃក្នុងវត្តនីមួយៗនៅឡើយទេ ។ ហេតុ ដូច្នេះហើយបានជាសហគមន៍ព្រះសង្ឃខ្មែរនៅ ស.រ.អា មានបំណងបំពេញតួនាទីដែលវត្តខ្មែរ ខ្វះខាតនៅបរទេសនោះឱ្យមានចងជាចង្កោម ដើម្បីបំរើព្រះធម៌របស់ព្រះសម្មាសម្ពុទ្ធឱ្យបំពេញ ការងារដូចៗគ្នាបាន ។ ក្នុងខណៈនេះព្រះតេជ គុណ សៅ ឃន គង់នៅវត្តត្រៃរតនារាមក្រុងឡូវែលព្រះអង្គបានទទួលការតែងតាំងជាព្រះប្រធាននៃសហគមន៍ព្រះសង្ឃខ្មែរ ។ ក្នុងកិច្ចប្រជុំចុងក្រោយបង្អស់របស់សហគមន៍ យើងឃើញមានការចូលរួមរបស់វត្តអារាមប្រមាណ១០វត្តដោយមានវត្តខាងស្រុកបារាំង និងកម្ពុជា ចូលរួមផង ក្នុងចំណោមវត្តដែលមានជាង១០០ ដែលបានកសាងយ៉ាងសើរនៅឯនាយសមុទ្រ។ មកទល់ថ្ងៃនេះ សហគមន៍ព្រះសង្ឃខ្មែរពុំទាន់មានអារាមស្នាក់ការខ្លួនឯងនៅឡើយទេ ហើយសំអាងថា បើព្រះតេជគុណនៅអធិការអង្គណាមួយ នឹងជាប់ឆ្នោតជាព្រះប្រធានសមាគមនោះ ពេលនោះទីស្នាក់ការនឹងផ្ទេរទៅទីនោះតាមតំណែងជាព្រះប្រធាននោះ ។

### ទីស្នាក់ការអចិន្ត្រៃយ៍នៃសមាគមព្រះសង្ឃខ្មែរ

នាបច្ចុប្បន្នទីស្នាក់ការសហគមន៍ព្រះសង្ឃខ្មែរស្ថិតនៅជាបណ្ដោះអាសន្ននៅវត្តត្រៃរតនារាម នាទីក្រុងឡូវែលដែលព្រះគ្រូ សៅ ឃន គង់នៅ ។ ខ្មែរប៉ុស្តិ៍ធ្លាប់បានផ្សព្វផ្សាយថា ព្រះតេជគុណសង្ឃាធិបតី សៅ ឃន ធម្មថេរោ ជាចៅអធិការនៃវត្តត្រៃរតនារាមតែគណកម្មការវត្តបានស្នើឱ្យមានការកែតម្រូវថា ព្រះអង្គឈប់គង់ជាចៅអធិការវត្តត្រៃរតនារាមនោះច្រើនឆ្នាំ ហើយលោកគង់នៅតែជាព្រះប្រធាននៃសហគមន៍ព្រះសង្ឃខ្មែរតែប៉ុណ្ណោះ ដូច្នេះសូមព្រះអង្គ សៅ ឃន មេត្តាអភ័យទោសពីការភ័ន្តច្រឡំដោយអចេតនានេះ ។ បើហេតុការណ៍ កើតយ៉ាងដូច្នេះបានន័យថា វត្តត្រៃរតនារាមមានគណកម្មការហើយតែគ្មានចៅអធិការនៅឡើយទេ ។

លោកស្រី ម៉ាគ្រេត ម្មេស ដែលជាពុទ្ធបរិស័ទចំណុះជើងវត្ត និងចាស់ទុំនៃក្រុងឡូវែលបានបង្ហើបឱ្យដឹងថា "ដីប៉ុំទំហំប្រមាណ១២អេគើបានទិញរួចហើយ តម្លៃ១លានដុល្លារសម្រាប់សង់វត្តជាទីស្នាក់ការរបស់សហគមព្រះសង្ឃខ្មែរស្ថិតនៅតាមដងស្ទឹងមេរីម៉ាក់មិនឆ្ងាយពីកន្លែងរៀបពិធីអុំទូកនោះទេ ពិធីបុណ្យផ្កាសម្រាប់រៃអង្គាសបច្ច័យផ្ដើមសង់វត្ត និងប្រព្រឹត្តទៅនៅដើមខែសីហានេះហើយ" ។

### ពិធីបុណ្យផ្កានៅដីថ្មី



ព្រះតេជគុណ សៅ ឃន បានប្រកាសពីបុណ្យផ្កាទី១របស់វត្តសហគមន៍ព្រះសង្ឃខ្មែរ គឺនៅថ្ងៃទី៧ ខែសីហា ឆ្នាំ ២០១១ នៅលើដីថ្មីដែលមានអស័យដ្ឋាន 810 Varnum Ave Lowell, MA 01558 ជាប់មាត់ស្ទឹងឡូវែលចំពីខាងក្រោយកន្លែងលេងប៊ូលីង "BRUN CHWICH "។ នៅលើផ្ទៃដីដ៏ធំទូលាយពុំទាន់កាប់ឆ្ការនៅឡើយព្រះអង្គ សៅ ឃន មានសង្ឃដីការថា "ព្រះអង្គនឹងផ្ដើមគង់នៅចូលព្រះវស្សាចំនួនបីខែចាប់ពីថ្ងៃ ទី ១៦ ខែកក្កដា នេះទៅហើយនៅថ្ងៃទី៧ ខែសីហា និងប្រារព្ធពិធីបុណ្យផ្កាលើដីវត្តថ្មីនោះថែមទៀតតែម្ដង ។ ក្នុងពិធីចុងក្រោយនេះកម្មសិទ្ធដីនឹងត្រូវចុះហត្ថលេខាដោយព្រះសង្ឃ៩អង្គដែលនឹងក្លាយទៅជាម្ចាស់នៃវត្តសមាគមព្រះសង្ឃខ្មែរ ។ ព្រះគ្រូ សៅ ឃន មានសង្ឃដីការបន្ថែមទៀតថា"វត្តសហគមន៍ព្រះសង្ឃខ្មែរ គឺជាដំណោះស្រាយសម្រាប់វិបត្តិដែលបានកើតឡើងជាច្រើនឆ្នាំនៅវត្តត្រៃរតនារាម គឺបានន័យថា នឹងពុំមានជាជម្លោះវត្តលើវត្តក្រោមដូចពេលមុនទៀតទេ"

### អគ្គលេខាសហគមន៍ព្រះសង្ឃខ្មែរចាកសិក្ខាបទ




ព្រះអង្គឫទ្ធិពល ដែលជាអគ្គលេខា និងជាសសរទ្រូងនៃសហគមន៍បានលាចាកសិក្ខាបទកាលពីសប្ដាហ៍កន្លងមកនេះ គេនៅពុំទាន់ដឹងថា ព្រះសង្ឃអង្គណាជាអ្នកមកបន្តវេណជាអគ្គលេខាសហគមន៍នៅឡើយទេ ៕